# ខ្មែរប៉ុស្តិ៍
# The Khmer Post
ISSUE 39 8th- 22th July 2009



## រំលឹកពីរដ្ឋប្រហារឆ្នាំ1997 បញ្ចប់កម្លាំងទ័ពហ៊ុនស៊ិនប៊ិច

Long Beach, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា

●●● ថ្ងៃទី5-6 កក្កដា ឆ្នាំ 2009 ជាខួប12ឆ្នាំ នៃអំពើរដ្ឋប្រហារបង្ហូរឈាមដាក់គ្នារវាងកងទ័ព ស្មោះស្ម័គ្រនឹងសហនាយករដ្ឋមន្ត្រីទី1 គឺសម្ដេច ក្រុមព្រះ នរោត្តម រណឫទ្ធិ និងកម្លាំងយោធា ម្ខាងទៀតដែលមានភក្តីភាពជាមួយសហនាយក រដ្ឋមន្ត្រីទី2 គឺបុរសដ៏មានអំណាចខ្លាំងនៃប្រទេសកម្ពុជា(Strongman) លោក ហ៊ុន សែន ដែល រដ្ឋប្រហារកាលពីខែកក្កដា ឆ្នាំ 1997 ត្រូវបាន រដ្ឋាភិបាលកម្ពុជាអាណត្តិទី1 ពីភាគីម្ខាងដែល ដឹកនាំដោយគណបក្សប្រជាជនកម្ពុជា (CPP) ដែលក្ដាប់អំណាចដោយ នាយក រដ្ឋមន្ត្រីទី2 ហ៊ុន សែន បានចោទប្រកាន់ថា ការផ្ទុះអាវុធនេះឡើង គឺបំណងបោសសំអាតពួកកម្លាំងអនាធិបតេយ្យ តទៅទំព័រទី ១៦

## បក្សប្រឆាំងខ្មែរបង្ហាញពីយុទ្ធសាស្ត្រឈ្នះឆ្នោត

ដោយ : ពិន សំខុន

●●● មួយថ្ងៃបន្ទាប់ពីពិធីជប់លៀងទទួលប្រធានគណបក្សប្រឆាំងកម្ពុជា នៅថ្ងៃទី ១៣ ខែមិថុនា ឆ្នាំ ២០០៩ នាវត្តព្រះពុទ្ធរង្សី ហ្វីឡាដែលហ្វីយ៉ា ខាងត្បូង លោក សម រង្ស៊ី លោក កឹម សុខា និង លោក យ៉ែម ប៉ុណ្ណារិទ្ធ ទាំងបីនាក់ជាអ្នកតំណាងរាស្ត្រនៃសភាខ្មែរ តទៅទំព័រទី ១០



## ព្យួរអភ័យឯកសិទ្ធិ មូរ សុខហួរ និង ហូ វ៉ាន់

ភ្នំពេញ, ខ្មែរប៉ុស្តិ៍ : ស៊ឹម សុភាឫទ្ធិ

●●● រដ្ឋសភាដែលគ្រប់គ្រងដោយគណបក្សប្រជាជនកម្ពុជាផ្ដាច់មុខ បានបើកសម័យប្រជុំបិទទ្វារមិនឱ្យអ្នកកាសែត អង្គការសង្គមស៊ីវិល និងអ្នកសង្កេតការណ៍ចូលស្ដាប់ឡើយ ហើយបានលើកដៃជាឯកច្ឆន្ទបោះឆ្នោតព្យួរអភ័យឯកសិទ្ធិលោក ស្រី មូរ សុខហួរ មណ្ឌលកំពត និង លោក ហូ វ៉ាន់ មណ្ឌលភ្នំពេញ មកពីគណបក្សសម រង្ស៊ី ពីបទបរិហារកេរ្តិ៍ ។ ការបិទមាត់អ្នកតំណាងរាស្ត្រទាំងពីររូប តទៅទំព័រទី ០៨

លោក ហូ វ៉ាន់ និងលោក មូរ សុខហួរ

# តើកម្លាំងសម្ព័ន្ធភាពធំប៉ុណ្ណា ?

ដោយ : សុបិន ថាច់

●●●ខ្មែរប៉ុស្តិ៍ បានទៅទីក្រុង ឡូវែល ដែលជាក្រុងសំខាន់ទី២ មានសហគមន៍ខ្មែរ រស់នៅច្រើន ( ប្រមាណជា៦០.០០០នាក់ ) នាសប្តាហ៍កន្លងទៅ ( ១៥ មិថុនា ) លោក សម រង្ស៊ី និង លោក កឹម សុខា បានធ្វើដំណើររួមគ្នាទៅតំបន់នោះ ។

**បទសម្ភាសន៍ជាមួយវេជ្ជបណ្ឌិត កែវ សម្បត្តិ**

**សុបិន ថាច់ :** លោក វេជ្ជបណ្ឌិត កែវ សម្បត្តិ ដែលជាសកម្មជនដ៏សំខាន់ម្នាក់របស់គណបក្សសិទ្ធិមនុស្សនៅ ស.រ.អា តើលោកមើលឃើញសម្ព័ន្ធភាពរវាងគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី តើគួរឱ្យសង្ឃឹមប៉ុណ្ណាដែរ ?

**កែវ សម្បត្តិ :** ខ្ញុំមាន សង្ឃឹមមិនលើស៥០%ទេ ហេតុអ្វី ? សម្ព័ន្ធភាពដែលយើងចង់ដឹងពីលោក សម រង្ស៊ី ពុំទាន់បានបញ្ចេញឱ្យយើងដឹងច្បាស់លាស់ថា អាចឱ្យឡើងដល់ ៨០% ឬ ៩០%នៅឡើយទេ ខ្ញុំវាយតម្លៃទៅលើតែសម្តីលោក រង្ស៊ី តែប៉ុណ្ណឹងការជាក់ស្តែងខ្ញុំពុំទាន់ដឹងនៅឡើយទេ ។

**សុបិន :** បើនៅលើសម្ព័ន្ធភាពលោកមិនទាន់ជឿទេ តើធ្វើដូចម្តេចឱ្យឈ្នះឆ្នោតនៅស្រុកខ្មែរ ?

**កែវ សម្បត្តិ :** នៅក្នុងរយៈពេលកន្លះឆ្នាំ ឬមួយឆ្នាំទៅមុខប្រហែលជាសម្ព័ន្ធភាពអ្នកប្រជាធិបតេយ្យនេះ អាចនឹងចេញជាពន្លឺបាន ពីព្រោះលោក សម រង្ស៊ី ពុំដែលលើកយកសម្ព័ន្ធភាពនេះមកនិយាយទេរហូតពេលលោកមកដល់ ស.រ.អា លើកចុងក្រោយនេះ ទើបខ្ញុំបានឮលោក សម រង្ស៊ី និយាយពីរឿងនេះ ហេតុនេះហើយទើបខ្ញុំមិនសូវសង្ឃឹម ។



**សុបិន :** តើគណបក្សសិទ្ធិមនុស្ស នឹងធ្វើអ្វីដើម្បីឱ្យលោក សម រង្ស៊ី ផ្លាស់ប្តូរចិត្តមកជឿលើសម្ព័ន្ធភាពវិញបាន ?

**កែវ សម្បត្តិ :** ខ្ញុំជឿថា ជាទី១ គណបក្សសិទ្ធិមនុស្ស ត្រូវមើលខ្លួនឯងជាមុនសិន គឺប្រសិនបើយើងរឹងប៉ឹង ហើយធ្វើឱ្យលោក សម រង្ស៊ី ត្រូវការយើងជាចាំបាច់ ទើបប្តូរបាន ។ ទី២ លោក សម រង្ស៊ី គួរគិតថា លោកឆ្នាំនេះអាយុ៦០ឆ្នាំហើយ បើមិនរួបរួមគ្នាទេ ខ្ញុំមិនដឹងថា លោកនឹងបានឡើងធ្វើជានាយករដ្ឋមន្ត្រីពេលណានោះទេ ពីព្រោះពុំមែនឈ្នះគេដោយសារតែគណបក្ស សម រង្ស៊ី តែមួយនោះទេ គឺរួបរួមគណបក្សអ្នកប្រជាធិបតេយ្យទាំងអស់ បើរៀងរាល់ពេលបោះឆ្នោត សម រង្ស៊ី បានតែ ២-៣ កៅអីបន្ថែម រីឯគណបក្សប្រជាជនគេលួចផង គេបន្លំផង ឥឡូវបាន៩០កៅអី តើពេលណានឹងបានឈ្នះខ្ញុំមិននិយាយថា យើងត្រូវតែចាញ់រហូតនោះទេ តែបើមិនរួបរួមគ្នាការឈ្នះមិនងាយមកដល់ទេ ប្រហែលជាផុតអាណត្តិលោក កឹម សុខា ក៏នៅតែមិនឈ្នះដែរពីព្រោះលោក កឹម សុខា មានតែពីរអាណត្តិទេ ។

**សុបិន :** លោកជាអ្នកឱ្យយោបល់ទៅគណៈបក្សសិទ្ធិមនុស្ស តើនៅ ស.រ.អា និងនៅកាណាដា លោកយល់ថា តើគណបក្សសិទ្ធិមនុស្ស និងគណបក្ស សម រង្ស៊ី ណាមួយមានការគាំទ្រច្រើនជាង ?

**កែវ សម្បត្តិ :** ក្នុងនាមខ្ញុំជាអ្នកប្រតិបត្តិរបស់គណបក្សសិទ្ធិមនុស្ស បើនិយាយទៅគេនឹងយល់ថា និយាយយកល្អតែខ្លួនឯង តែខ្ញុំមើលឃើញការរីកចំរើនរបស់គណបក្សសិទ្ធិមនុស្សមានចំនួនកើនយ៉ាងច្រើនគួរឱ្យចាប់អារម្មណ៍ខ្លាំងណាស់ យើងឥឡូវមានអ្នកមកជួយកិច្ចការថ្នាក់បរិញ្ញាប័ត្រ ឬបណ្ឌិតកាន់តែមានចំនួនច្រើន យើងនឹងមានបញ្ញាវន្តធ្វើការគ្រប់គ្រាន់នៅពេលឆាប់ៗខាងមុខមិនខាន ។

**សុបិន :** សូមអរគុណលោកបណ្ឌិត ។

**វ៉ែន វ៉ាតាណា : ប្រធានគណបក្សសិទ្ធិមនុស្សប្រចាំ ញូអ៊ិនគ្លិន រដ្ឋមាសាឈូសែត ។**

**សុបិន :** នៅចុងសប្តាហ៍កន្លងមកនេះ គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស ទើបនឹងធ្វើពិធីជប់លៀងរួមគ្នាមួយនៅឡូវែលនេះ និងនៅកាណាដា ខ្ញុំចង់ដឹងពីយោបល់របស់លោក ថាតើទទួលបានជោគជ័យប៉ុណ្ណា ?

**វ៉ែន វ៉ាតាណា :** ខ្ញុំបានឃើញថា មនុស្សដែលជាសកម្មជនរបស់គណបក្សនោះ បានចូលរួមយ៉ាងច្រើន ក៏ប៉ុន្តែអ្នកដែលមិនចូលគណបក្សណាមួយនោះក៏មានចំនួនច្រើនណាស់ដែរ បាននេះជាការជោគជ័យរបស់គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សនោះហើយ ។

**តទៅទំព័រទី ០៣**

# បទយកការណ៍ : ពីក្រុងម៉េកិន (MACON) រដ្ឋហ្សកចា (GEORGIA)

## មហាសន្និបាតប្រចាំឆ្នាំគ្រីស្ទបរិស័ទខ្មែរ

**ដោយ : ម៉ម យ៉ិន**

០០០នៅពេលក្រុមគ្រីស្ទបរិស័ទខ្មែរបាប់ទីស្ទ បានមកជួបជុំគ្នា ដែលជាការប្រជុំមហាសន្និបាតប្រចាំឆ្នាំទី២៥ នៅក្នុងទីកន្លែងផ្សេងៗ ដែលគេបានកំណត់យកកាលពីឆ្នាំមុនៗនោះ កាលពីថ្ងៃ ទី១៣ ដល់ថ្ងៃទី ១៥ ខែមិថុនា ឆ្នាំ ២០០៩ មានប្រជាពលរដ្ឋខ្មែរប្រមាណជាងបីរយនាក់ ទាំងចាស់ទាំងក្មេង ដែលជាគ្រីស្ទបរិស័ទខ្មែរបាប់ទីស្ទ បានធ្វើដំណើរមកពីរដ្ឋនានាជាច្រើន ខ្លះដោយអាកាសយាន ខ្លះដោយរថយន្ត ដូចជាមកពីរដ្ឋ ម៉ូនីស្សូតា រដ្ឋផេនស៊ីលវេនីយ៉ា រដ្ឋអូហៃយ៉ូ រដ្ឋ ហ្វ្លរីដា រដ្ឋ អៃដាហូ ជាដើម ។ល។

ការជ្រើសរើសយកទីក្រុង ម៉េកិន (MACON) រដ្ឋ ហ្សកចា នេះ ពីព្រោះក្រុមគ្រីស្ទបរិស័ទខ្មែរនេះ មានលោកបណ្ឌិតម្នាក់ ឈ្មោះ ស៊ាងយីវ គាត់មានដីប្រមាណជាង ៣០ហិតា លោកបានលើកថ្វាយទៅព្រះអម្ចាស់ ដើម្បីបង្កើតជាមជ្ឈមណ្ឌលខាងការសិក្សា ពង្រីកសេចក្ដីជំនឿទៅលើព្រះអម្ចាស់ យេស៊ូវគ្រីស្ទ បន្ទាប់មកលោកបណ្ឌិត ស៊ាងយីវ បានប្រជុំគ្នាប្រសិទ្ធិនាមដីនេះថា " វាលព្រះពរ " ដោយយោងទៅតាមបុព្វហេតុ ១ ដែលកើតឡើងនៅក្នុងប្រទេសកម្ពុជានាសម័យដ៏ព្រៃផ្សៃរបស់ខ្មែរក្រហម បានសម្លាប់ជីវិតជនជាតិខ្មែរ អស់ប្រមាណជាង ៤លាននាក់ ហើយប្រវត្តិសាស្ត្រនេះ បានចែងទុកថាជា "វាលពិឃាដ " ធ្វើឱ្យជនជាតិខ្មែរខ្លះ ដែលបានរស់រានជីវិតចងចាំជាប់ជានិច្ច នូវសេចក្ដីទុក្ខវេទនាមហាខ្លោចផ្សារ មហាព្រាត់ប្រាស់គ្នានេះ ។ បន្ទាប់មកជីវិតខ្មែរ ដែលបានរួចរស់ជីវិតក៏ដោយសារតែព្រះពរ និងព្រះគុណនៃព្រះអម្ចាស់ យេស៊ូវ-គ្រីស្ទ បានកែប្រែជីវិតថ្មី ហើយបានប្រកបសេចក្ដីសុខសាន្តក្នុងជីវិត មានសភាពជាមនុស្ស ដែលព្រះបានបង្កើតមក តាំងពីដើមកំណើតនៃផែនដីមកម្ល៉េះ ។ ដូច្នេះ នេះជាសេចក្ដីជំនឿដ៏ពិតប្រាកដនៃគ្រីស្ទបរិស័ទខ្មែរ ក៏ដូចជាគ្រីស្ទបរិស័ទនៅលើពិភពលោកដែរ ។

ទោះបីជាជនជាតិខ្មែរ មានចំនួនតិច ជាអ្នកមានជំនឿលើព្រះគ្រីស្ទសាសនាយ៉ាងណាក៏ដោយ ក៏ខ្មែរប្រមាណ ៥ ភាគរយ ដែលបានមករស់នៅសហរដ្ឋអាមេរិក បានសម្រេចចិត្ត ប្ដេជ្ញាថា ត្រូវតែសាមគ្គីរួបរួមគ្នាក្នុងសេចក្ដីស្រឡាញ់ដ៏បរិសុទ្ធក្នុងព្រះយេស៊ូវគ្រីស្ទ ដើម្បីប្រមែប្រមូលកម្លាំងគ្នា ទាំងកម្លាំងកាយចិត្ត ប្រាជ្ញា និងលុកកាក់ទ្រព្យសម្បត្តិ កសាង និងបង្កើតជាទីបរិសុទ្ធរបស់ព្រះ គឺព្រះវិហារ ដើម្បីឱ្យគ្រីស្ទបរិស័ទនាំគ្នាចូលទៅថ្វាយបង្គំព្រះអម្ចាស់ជារៀងរាល់ថ្ងៃអាទិត្យ ដែលជាថ្ងៃបុណ្យរបស់ព្រះ ទ្រង់បានប្រទានឱ្យដល់មនុស្សជាអ្នកជឿ ដើរតាម និងគោរពស្ដាប់បង្គាប់តាមព្រះបន្ទូលព្រះអង្គ ។

គ្រីស្ទបរិស័ទខ្មែរបាប់ទីស្ទ ដែលជានិកាយ១ធំជាងគេនៅក្នុងសហរដ្ឋអាមេរិក ដែលបានរៀបចំគម្រោងសាងសង់មជ្ឈមណ្ឌលសិក្សាពង្រីង និងពង្រីកសេចក្ដីជំនឿទៅលើព្រះអម្ចាស់យេស៊ូវគ្រីស្ទ ។

មជ្ឈមណ្ឌលនេះ ចាត់ទុកជាទីកន្លែង១ សំរាប់បំរើកិច្ចការព្រះអង្គ សម្រាប់គ្រប់និកាយទាំងអស់នៃគ្រីស្ទសាសនា ដែលបងប្អូនខ្មែរ បានប្រកាន់យក ដូចជាចង់រៀបចំជួបជុំគ្នាជាមហាសន្និបាតជាសម្របសម្រួលកិច្ចការគ្រួសារ ជាការបោះជំរុំជាដើម ។ មកដល់ថ្ងៃនេះ គណកម្មាធិការរៀបចំវាលព្រះពរនេះ បានស្ថាបនាផ្លូវថ្នល់ចូល សង់អាគារបាន៣ខ្នង គឺអាគារទទួលទានអាហាររោងចំអិនអាហារ អាគារប្រជុំធំ ហើយនិងទីធ្លាសំរាប់បោះជំរុំ ចតរថយន្ត ហើយអាចចូលទៅប្រារព្ធធ្វើបានគ្រប់ពេលវេលា និងគ្រប់រដូវ ។ ជាការជាក់ស្ដែង នៅក្នុងរយៈពេល ៣ថ្ងៃ ចាប់ពីថ្ងៃទី១៣ ដល់ទី១៥ ខែមិថុនា កន្លង ទៅនេះ ក្រុមប្រឹយសម្ព័ន្ធគ្រីស្ទ បរិស័ទខ្មែរបាប់ទីស្ទ បានប្រជុំមហាសន្និបាតប្រចាំឆ្នាំ ដែលមានរៀបចំកម្មវិធីយ៉ាងមានរបៀបរៀបរយ ដូចជាការសិក្សាព្រះបន្ទូល តាមរយៈលោកបណ្ឌិតសំខាន់ៗ ជាភ្ញៀវកិត្តិយស ដោយបានធ្វើអត្ថាធិប្បាយយ៉ាងច្បាស់លាស់ ។ មិនតែប៉ុណ្ណោះការប្រកបគ្នាជាបងប្អូនស្ទូនក្សារួមជំនឿ បានស្ម័គ្រចិត្តឡើងច្រៀងចម្រៀងសរសើរតំកើងព្រះជាក្រុម ឬជាឯកជនម្នាក់ៗ ព្រមទាំងមានការស្ម័គ្រចិត្តឡើងថ្លែងទីបន្ទាល់ពីការអស្ចារ្យផ្សេងៗ ដែលព្រះវិញ្ញាណបរិសុទ្ធនៃព្រះបានសណ្ឋិត ហើយបានសំដែងឱ្យរូបគេបានឃើញនៅក្នុងជីវិត ដែលជាហេតុអស្ចារ្យចេញមកពីព្រះចេស្ដាបារមីរបស់ព្រះអង្គយេស៊ូវគ្រីស្ទ។

មហាសន្និបាតចំនួន៣ថ្ងៃនេះ បានបង្ហាញពីទឹកចិត្តសប្បាយរីករាយ ពោពេញទៅដោយសេចក្ដីសង្ឃឹម សេចក្ដីនឹករលឹកគ្នា សេចក្ដីស្រឡាញ់គ្នាក្នុងព្រះគ្រីស្ទ ដែលបានមកជួបគ្នាវិញ នៅក្នុងរយៈពេល១ឆ្នាំម្ដង ឬពីរដង ។

ឧត្តមសេនីយ៍ត្រី ម៉ម យ៉ិន

នេះគឺជាលើកដំបូងហើយ នៅក្នុងរយៈពេលជិត៣០ឆ្នាំកន្លងមកនេះ គឺជាទីកន្លែងដែលគណកម្មាធិការវាលព្រះពរ បានរៀបចំដីព្រៃដើមស្រល់របស់លោកបណ្ឌិត ស៊ាងយីវ ហើយលោកបានថ្វាយជាដង្វាយដល់ព្រះអម្ចាស់ ដើម្បីរៀបចំសាងសង់ឱ្យទៅជាមជ្ឈមណ្ឌលនៃគ្រីស្ទបរិស័ទខ្មែរ នៅសហរដ្ឋអាមេរិក ។

វាលព្រះពរនេះ មានទំហំជាង៣០ហិតា ប្រកបដោយព្រៃដើមស្រល់ លាយឡំជាមួយដើម ភីឃន ឥឡូវនេះមានទំហំប្រមាណ ៤ហិតា បានក្លាយជាវាល មានដាំដើមទន្លាប់ប្រមាណ ២៥០ដើម ។ កាលពីឆ្នាំ២០០៧ លុះដល់ឆ្នាំ ២០០៨ គម្រោងសង់អាគារបានចាប់ផ្ដើម អាគារទី១ ជារោងអាហារ បានសង់ហើយ អាគារទី២ ដែលជាអាគារធំ សំរាប់ធ្វើសាលប្រជុំ ប្រមាណ ៥០០នាក់ បានសង់ហើយនៅដើមខែមិថុនា ឆ្នាំ ២០០៩ រួចហើយធ្វើពិធីសម្ពោធឱ្យប្រើប្រាស់នៅថ្ងៃទី១៣ ខែមិថុនា ឆ្នាំ២០០៩ នេះ ។

គណកម្មាធិការវាលព្រះពរ មានគម្រោងសាងសង់អាគារសំខាន់ៗបន្តទៅទៀត នៅពេលណាមានថវិកាមួយចំនួនល្មមអាចបំពេញការងារសាងសង់នេះបាន ៕

---

តមកទំព័រទី០២

## តើកម្លាំងសម្ព័ន្ធភាព...

**សុបិន :** ខ្ញុំបានសាកសួរមនុស្សនៅតាមផ្លូវនៅទីក្រុងឡូវែល នេះ ជាទូទៅគេយល់ថាសម្ព័ន្ធភាពនេះ បានតែ៤០%ទេ តើចំពោះលោកយល់ស្របទេ ?

**វិន វ៉ាតាណា :** និយាយឱ្យចំទៅខ្ញុំមានសុទិដ្ឋិនិយមច្រើន បើស្ដាប់សម្ដីលោកប្រធានទៅលោកទាំងពីរមានបំណងចូលគ្នា ហើយជឿលើឯកឧត្ដម កឹម សុខា ថាពិតជាមានបំណងចូលរួមសម្ព័ន្ធភាពមែន ចំណែកឯកឧត្ដម សម រង្ស៊ី បានជជែកគ្នាប៉ុណ្ណោះ ខ្ញុំពុំដឹងទេ ខ្ញុំបាននិយាយជាមួយឯកឧត្ដម កឹម សុខា លោកនិយាយថា លោក សម រង្ស៊ី ចង់បានអ្វីក៏លោកព្រមដែរ ឱ្យតែមានការរួបរួមគ្នា ក៏ប៉ុន្តែពុំមានន័យថា រំលាយគណបក្សសិទ្ធិមនុស្សទៅចូលគណបក្ស សម រង្ស៊ី នោះទេ ឯកឧត្ដម កឹម សុខា មានសុឆន្ទៈណាស់ចំពោះសម្ព័ន្ធភាពហ្នឹង ដូច្នេះកូនសោនៅឯខាងឯកឧត្ដម សម រង្ស៊ី ឯណោះទេ ។

**សុបិន :** តើលោកយល់ថា គណបក្សសិទ្ធិមនុស្សត្រូវធ្វើអ្វី ដើម្បីឱ្យគណបក្ស សម រង្ស៊ី និយាយច្បាស់លាស់អំពីសម្ព័ន្ធភាពហ្នឹងបាន ?

**វិន វ៉ាតាណា :** គណបក្សសិទ្ធិមនុស្សបានបង្ហាញគំនិតស៊ីជម្រៅរបស់ខ្លួនរួចហើយ រីឯ-គណបក្ស សម រង្ស៊ី ពុំទាន់បានធ្វើនៅឡើយទេ គ្រាន់តែបង្ហាញស៊ើៗប៉ុណ្ណោះ ។

**សុបិន :** តើសមាជិកគណបក្ស សម រង្ស៊ី នៅទីនេះ មានការយល់ឃើញដូចប្រធានគេដែរ ឬទេ ?

**វិន វ៉ាតាណា :** ខ្ញុំបានសំណេះសំណាលជាមួយសកម្មជនគណបក្ស សម រង្ស៊ី នៅឡូវែលនេះ ជាញឹកញាប់គេមានការយល់ស្របថា ការចូលរួមរវាងគណបក្សទាំងពីរប្រាកដជាបានលទ្ធផលល្អក្នុងការបោះឆ្នោតនាថ្ងៃខាងមុខ ហើយខ្ញុំឮសមាជិកសភាគណបក្ស សម រង្ស៊ី និយាយសរសើរអំពីសម្ព័ន្ធភាពនេះដូចគ្នាដែរ ដូច្នេះខ្ញុំឃើញសមាជិកគណបក្ស សម រង្ស៊ី ច្រើនណាស់ ដែលយល់ស្របនឹងយើងថា ការរួបរួមគ្នានោះប្រសើរណាស់ រីឯទំនាក់ទំនងជាមួយប្រធានគេយ៉ាងណានោះ ខ្ញុំឥតដឹងទេ ។

**សុបិន** : នៅហ្វីឡាដែលហ្វីយ៉ា គណបក្សសិទ្ធិមនុស្សបានចូលលុយច្រើនជាងសម្រាប់រៀបចំពិធីជប់លៀង តើនៅឡូវែលនេះដូចគ្នាដែរឬទេ ?

**វិន វ៉ាតាណា :** យើងដឹងថា មានមនុស្សចូលរួមច្រើន ហើយយើងពុំបានស្រាក់លុយគ្នាតាមគណបក្សនោះទេ យើងគ្រាន់តែដឹងថាអញ្ជើញភ្ញៀវឱ្យបានច្រើនមកចូលរួមក្នុងពិធីជប់លៀងប៉ុណ្ណោះ ។

**សុបិន** : អញ្ចឹង តើសមាជិកគណបក្សសិទ្ធិមនុស្សមកចូលរួមបានពាក់កណ្ដាលទេ ។

**វិន វ៉ាតាណា ::** យើងជាគណបក្សសិទ្ធិមនុស្សបានចូលរួមយ៉ាងកុះករស្ទើរតែទាំងអស់គ្នាទៅហើយ រីឯការចូលលុយ យើងឥតគ្រប់គ្រង់ទេ យើងបានចរចាជាមួយគណបក្ស សម រង្ស៊ី ថា ឱ្យគណបក្ស សម រង្ស៊ី រៀបចំ បើចំណេញយើងមិនយកចំណែកទេ បើខាតយើងនឹងជួយចេញរួមគ្នា គឺមានបំណងចង់ឃើញការរួបរួមគ្នាតែប៉ុណ្ណោះ ហើយយើងឥតឃើញទាមទារចែកចំណែកមកយើងវិញទេ ។

**សុបិន : សូមអរគុណ !**

**ប៊ុណ្ណា អ៊ុន នៅ ឡូវែល ជាអ្នកកាន់ថវិកា ស.រ.អា និងកាណាដា ។**

សុបិន : លោក ប៊ុណ្ណា ជាអ្នកកាន់លុយកាក់របស់គណបក្សសិទ្ធិមនុស្ស តើលោកអាចប្រាប់ខ្ញុំបានទេថា អ្នកធ្វើនយោបាយអ្នកជួយសង្គមខ្មែរ ដល់ធ្វើយូរៗ

តទៅទំព័រទី ១៩

# (តមកពីលេខមុន) តុលាការខ្មែរក្រហម : នួន ជា ថា យួនជាអ្នកបំបែកបំបាក់ និងផ្ដួលរំលំក្រុមខ្លួន

*Long Beach*, ***ខ្មែរប៉ុស្ដិ៍ : ទិត្យ សុវណ្ណារិទ្ធិ***

●●● បានបញ្ជាក់ថា ក្នុងខែឧសភា ឆ្នាំ 1977 ខ្មែរក្រហមបានសម្រេចថា ត្រូវតែវាយប្រហារទៅលើវៀតណាម ជាជាងការទប់ស្កាត់កងទ័ពវៀតណាមឈ្លានពាន ។ វៀតណាមដែលក្រុមខ្មែរក្រហមចាត់ទុកថា មានសារជាតិឈ្លានពានប្រទេសកម្ពុជា ដើម្បីពង្រីកទឹកដីតាមរយៈនយោបាយសហព័ន្ធឥណ្ឌូចិន ។ ក្នុងពេលនោះ មេដឹកនាំខ្មែរក្រហមបានបញ្ជាទៅកាន់ភូមិភាគបូព៌ាដើម្បីឱ្យវាយលុកលើប្រទេសវៀតណាម ដែលមាន ហ៊ុន សែន ជាសមាជិកកងទ័ពខ្មែរក្រហម ដែលជាអ្នកទទួលខុសត្រូវផែនការនៅតំបន់នោះ ។ ប៉ុន្តែ ហ៊ុន សែន មិនបានធ្វើតាមបញ្ជាថ្នាក់លើ ដើម្បីវាយប្រហារលើវៀតណាមទេ ដោយ ហ៊ុន សែន បានរត់ចូលព្រៃ និងសហការជាមួយវៀតណាមវាយបកផ្ដួលរំលំរបប ប៉ុល ពត វិញ ។

Nayan Chanda បានបន្ថែមថា នៅតាមតំបន់ព្រំដែនផ្សេងទៀត ខ្មែរក្រហមបានបើកការវាយប្រហារទៅលើភូមិមួយចំនួនរបស់យួន ដែលស្ថិតនៅតាមបណ្ដោយព្រំដែនកម្ពុជា ។ ដោយទំនាក់ទំនងការទូតរវាងកម្ពុជា និងយួនក៏បានចុះថមថយ និងក្រោយមកត្រូវបានកាត់ផ្ដាច់នៅចុងឆ្នាំ 1977 បន្ទាប់ពីយួនបានបើកការវាយប្រហារជាទ្រង់ទ្រាយធំ មកលើកម្ពុជានៅខែតុលា ឆ្នាំ 1977 ។ យួនបានវាយលុកតាមព្រំដែន ដោយប្រើតាមផ្លូវអាកាស និងប្រើរថក្រោះ50គ្រឿង ចូលជាង10គីឡូម៉ែត្រក្នុងទឹកដីកម្ពុជានៅខេត្តស្វាយរៀងក្នុងខែមករា ឆ្នាំ 1978 ដើម្បីវាយប្រហារកងទ័ពខ្មែរក្រហម ដែលមានការឧបត្ថម្ភគាំទ្រដោយប្រទេសចិន ។


លោក កាំង ហ្គេចអ៊ាវ ហៅ ឌុច

លោក កាំង ហ្គេចអ៊ាវ ហៅ ឌុច និយាយថា ជម្លោះនេះបានបង្កឡើងមកពីជម្លោះរវាងបក្សកុម្មុយនិស្ដកម្ពុជា និងបក្សកុម្មុយនិស្ដយួន ដោយឌុច អះអាងថា ប៉ុល ពត បានតស៊ូការពារប្រទេសជាតិ និងឈ្លាសវៃ ដែលអាចដឹកនាំរក្សាអធិបតេយ្យភាព និងអាចរក្សាបូរណភាពទឹកដីកម្ពុជាបាន ។ ប៉ុល ពត មិនអនុគ្រោះឱ្យមានផែនការឥណ្ឌូចិននៅលើទឹកដីកម្ពុជាឡើយ ។

ក៏ប៉ុន្តែក្នុងខែមីនា ឆ្នាំ 1976 ប្រធានាធិបតីយួន ឡេ យន់ នៅតែរក្សាផែនការសហព័ន្ធឥណ្ឌូចិន ដែលការណោះយួននៅតែតាំងខ្លួនថា គេជាបិតាសហព័ន្ធឥណ្ឌូចិន ។ ស្របនឹងប្រវត្តិសាស្ត្របានបង្ហាញថា នយោបាយសហព័ន្ធឥណ្ឌូចិនរបស់យួនមានបំណងចង់យក ប្រទេសជិតខាង ជាពិសេស យួនចង់យក ប្រទេសកម្ពុជាធ្វើជារណបក្រោមការគ្រប់ គ្រងរបស់ខ្លួន ។

ប៉ុន្តែទោះបីជាយ៉ាង ណាក៏ដោយ ឌុច បានដាក់កំហុសលើខ្មោច ប៉ុល ពត និងខ្មោច ឡេ យន់ អតីតលេខាបក្ស កុម្មុយនិស្ដយួន ដែលបង្កឱ្យមានសង្គ្រាមបង្ហូរឈាម ដែលកើតចេញមកពីប្រភពនៃទំនាស់ស្លាប់រស់រ៉ាំរ៉ៃ និងយូរអង្វែង ។ តាំងពីឆ្នាំ1954 ឡេ យន់ នៅតែតាំងខ្លួនជាបិតាសហព័ន្ធ ឥណ្ឌូចិន ទោះជាទំនាស់រវាង ប៉ុល ពត និង ឡេ យន់ គេទាស់គ្នាជាបុគ្គលតែម្នាក់ៗ មានបក្សរៀងខ្លួនមានកងទ័ពរៀងខ្លួន ដូច្នេះវាអន្តរាយ និងហូរឈាមរាស្ត្រតូចតាច ។

រម្លឹកពីប្រវត្តិសាស្ត្រ ឌុច តំណាលថា ទំនាស់រវាង ប៉ុល ពត និង ឡេ យន់ ជាទំនាស់មនោគមវិជ្ជាដ៏ជ្រាលជ្រៅរវាងបក្សកុម្មុយនិស្ដកម្ពុជា និងបក្សកុម្មុយនិស្ដយួន ។ គឺ ប៉ុល ពត បានដាក់ចេញនូវមាគ៌ានយោបាយរបស់បក្សកុម្មុយនិស្ដកម្ពុជា នៅឆ្នាំ 1973 ដែលផ្ទុយស្រលះពីមាគ៌ាទ្រឹស្ដីរបស់ហូជីមិញ ។ ហូជីមិញ អតីតលេខាបក្សកុម្មុយនិស្ដយួន បានកំណត់ទ្រឹស្ដីអំពីបក្សកុម្មុយនិស្ដសហព័ន្ធឥណ្ឌូចិន ដែលត្រូវមានបក្សតែមួយកងទ័ពតែមួយ នឹងរដ្ឋាភិបាលតែមួយ ។ ពោលគឺត្រូវមានប្រទេសតែមួយក្នុងនាម សហព័ន្ធឥណ្ឌូចិន ក្នុងចំណោមប្រទេសកម្ពុជា ឡាវ និង យួន ។

នៅតែមានទឹកមុខ មុតមាំ និងចងចាំគ្មានភាន់ច្រលំពីប្រវត្តិសាស្ត្រ ឌុច បានគូសបញ្ជាក់ថា ជាពិសេស "ទំនាស់រវាងលេខាបក្សកុម្មុយនិស្ដកម្ពុជា និងបក្សកុម្មុយនិស្ដយួនមានរូបភាពជាទំនាស់បុគ្គលមែន តែវាជាទំនាស់មាគ៌ាពីរមិនដូចគ្នា ។ បុគ្គលមួយ មានបក្សតែបុគ្គលមួយទៀត ក៏មានបក្សដែរ ។

បុគ្គលមួយមានកងទ័ព ចំណែកបុគ្គលមួយទៀត ក៏មានកងទ័ពដូចគ្នា ។ ដូច្នេះក្រោយ ឆ្នាំ 1975 នៅពេលដែលបក្សកុម្មុយនិស្ដកម្ពុជា និងបក្សកុម្មុយនិស្ដយួន មានប្រទេសកាន់កាប់ និងមានរដ្ឋអំណាច ព្រមទាំងមានកងទ័ពនៅក្នុងដៃទាំងសង្ខាងអាពីរនាក់នេះ វាបុកគ្នា ។ ដូច្នេះអាណាបង្ករឿងយ៉ាងម៉េចៗ វាស្ថិតក្នុងក្របខណ្ឌទំនាស់មាគ៌ាហ្នឹង ។

មកដល់ត្រង់នេះ ឌុច បានសង្កត់ធ្ងន់ថា បន្ទាប់ពីហូជីមិញ បានស្លាប់នៅឆ្នាំ 1969 ឡេ យន់ បានឡើងជំនួសតំណែងជាលេខាបក្សកុម្មុយនិស្ដយួន ។ ឡេ យន់ នៅតែប្រកាន់ទ្រឹស្ដីរបស់ ហូជីមិញ ដែលចង់ក្រសោបយកកម្ពុជា និង ឡាវ ឱ្យទៅជាប្រជាជនតែមួយជាមួយនឹងប្រទេសយួនក្រោមឆ័ត្រសហព័ន្ធឥណ្ឌូចិន ។

ក៏ប៉ុន្តែ ប៉ុល ពត ក្រោយពីឡើងកាន់អំណាចនៅឆ្នាំ 1975 ចង់នៅស្មើភាពរៀងខ្លួន ដោយឈរលើមាគ៌ាឯករាជ្យម្ចាស់ការរបស់កម្ពុជា ។ ការលើកឡើងដូច្នេះ ឌុច ក៏មិនភ្លេចគូសបញ្ជាក់ដោយបដិសេធភ្លាមៗថា "តុលាការជាទីគោរព ខ្ញុំនិយាយនេះមិនមែនអះអាងថា ប៉ុល ពត ជាអ្នកស្នេហាជាតិដ៏មហាអស្ចារ្យទេ ប៉ុល ពត ជាឧក្រិដ្ឋជន ។ ប៉ុល ពត ជាបិតាឧក្រិដ្ឋកម្មធំបំផុតរបស់កម្ពុជា" ។

ការកត់សម្គាល់លោក ឡេ យន់ អតីតលេខាបក្សកុម្មុយនិស្ដយួន បានស្លាប់កាលពីថ្ងៃទី10 ខែ កក្កដា ឆ្នាំ 1986 ។ ចំណែក លោក ផាម វ៉ាន់ដុង អតីតនាយករដ្ឋមន្ត្រីយួនបានស្លាប់កាលពីថ្ងៃទី 29 មេសា ឆ្នាំ 2000 ។ ដោយឡែក ប៉ុល ពត លេខាបក្សកុម្មុយនិស្ដកម្ពុជា និងជាបងធំទី1 ក្នុងរបបខ្មែរក្រហមបានស្លាប់កាលពីថ្ងៃទី15 មេសា ឆ្នាំ 1998 ។

ការលើកឡើងខាងលើត្រូវបាន ឌុច គូសបញ្ជាក់នៅពេលតុលាការបានផ្ដល់ឱកាសឱ្យអតីតប្រធានគុកទួលស្លែងអាយុ 67 ឆ្នាំ រូបនេះ បញ្ចេញប្រតិកម្មលើស្នាដៃនិពន្ធសៀវភៅ "សត្រូវបងប្អូនឯង" និងការលើកឡើងរបស់សាក្សីជំនាញលោក Nayan Chanda ទាក់ទងនឹងជម្លោះប្រដាប់អាវុធរវាងខ្មែរក្រហម និងយួន ។

សាក្សីអ្នកជំនាញលោក Nayan Chanda ក៏បានបង្ហាញគោលគំនិតដ៏ធំបំផុតមួយដែល ឌុច មិន ធ្លាប់ឃើញ និងមិនធ្លាប់ដឹងពីមុនមក ។ នោះគឺ គោលគំនិតចេញពីមាត់របស់លោក ផាម វ៉ាន់ដុង (Pham Vandong) នាយករដ្ឋមន្ត្រីយួន ដែលបានលើកឡើងថា លោក ឡេ យន់ លេខាបក្សកុម្មុយនិស្ដយួនចង់អប់រំ ប៉ុល ពត ឱ្យងាកទៅតាមមាគ៌ាសហព័ន្ធឥណ្ឌូចិនរបស់ខ្លួន ។ តែបើសិនមិនអាចធ្វើបានទេ គេ (យួន) ឱ្យខ្មែរនៅក្នុង បក្សកុម្មុយនិស្ដកម្ពុជាទម្លាក់ ប៉ុល ពត ចេញពីលេខាបក្សកុម្មុយនិស្ដកម្ពុជា ។ ចុងក្រោយបើធ្វើមិនបានទៀតនោះ យួននឹងបង្ក្រាបលើរបបខ្មែរក្រហម ដែលដឹកនាំដោយ ប៉ុល ពត ។

ក៏ប៉ុន្តែ ឌុច បានជំទាស់នឹងការដាក់ចំណងជើងក្នុងសៀវភៅរបស់លោក Nayan Chanda ដែលថា សត្រូវបងប្អូនឯង ។ ឌុច ពន្យល់ថា បើនិយាយពីកូរ៉េលោកគាំទ្រ ព្រោះគេមានប្រវត្តិសាស្ត្ររួមគ្នា មានប្រវត្តិទឹកដី និងភាសារួមគ្នា ។ ក៏ប៉ុន្តែកម្ពុជា និងយួនមិនដែលមានទឹកដីរួមគ្នាទេ ។ យ៉ាងណាក៏ដោយ ឌុច បានបែរបន់ឱ្យ កូរ៉េ និងចិនជួបតែសំណាងល្អ ដូចអាល្លឺម៉ង់ ដែលអាល្លឺម៉ង់អាចរួបរួមជាបងប្អូននឹងគ្នាឡើងវិញ ៕


## The Khmer Post Directory

### East Coast Publication

Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum
**Advertising**
**Marketing Manager:**
**Sabane Thach**
**Phone : 267-253-3947**
**Email : sabane.thach@gmail.com**

### West Coast Publication

RegionalEditor : Sovannara Meach
Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith
**Phone: (562) 313-2129**
**Email: sovannara04@yahoo.com**


# អតីតយុទ្ធជនស្ម័គ្រចិត្តត្រូវបានទទួលស្គាល់

***ដោយ : បូពា ជុំ***

•••អតីតយុទ្ធជនខ្មែរ ទើបនឹងបានទទួលស្គាល់នូវគុណបំណាច់ក្នុងរយៈពេលដែលខ្លួនបានបំរើក្នុងកងទ័ព តើអ្នកទាំងនោះ បានធ្វើអ្វីខ្លះសម្រាប់ប្រវត្តិសាស្ត្រនៅកម្ពុជា **បូពា ជុំ** បានស្ដាប់យុទ្ធជនម្នាក់ម្ដងៗ ហើយរាយការណ៍ជូនសណ្ដាប់ :

**Cambodian Volunteer Reserves to be Recognized :**

## Seanchour Sor

Seanchour was born on January 2, 1965 in Battambang, Cambodia. She was an only



child. Seanchour's father worked as a painter in the city. She was a happy child.

During the Khmer Rouge era, Seanchour was separated from her family. She was still young and did not understand what was happening. Whole villages were exiled from their homes and sent to live in other villages. The people worked but were starved for food. Lastly, people were abused, threatened, and killed.

The Khmer Rouge used scare tactics and torture to get information about sus pected individuals who were thought to be rebellious, overly concerned, or anyone who asked questions.

Even if the questions were about a missing loved one. *Continue to Page 06*

# តំបន់ប្រាសាទព្រះវិហារអាចនឹងផ្ទុះអាវុធដាក់គ្នា

**បន្ទាប់ពីការចរចាទ្វេភាគី គឺអូសបន្លាយអស់រយៈពេលយ៉ាងយូរ ហើយហាក់ដូចជាគ្មានបានលទ្ធផលអ្វីជាដុំកំភួនគួរឱ្យកត់សម្គាល់នោះឡើយ ពួកទាហានសៀមបានឆ្លៀតឱកាសឈ្លានពានតំបន់មួយចំនួននៅតាម បណ្តាខេត្តជាប់ព្រំដែនកម្ពុជាទៀតផង ។**

ប្រាសាទព្រះវិហារខ្មែរ ដែលសៀមស្រក់ទឹកមាត់ចង់បាន


ហ៊ុន សែន នាយករដ្ឋមន្ត្រីខ្មែរ


អាប់ភីស៊ិត វិជ្ជាជីវៈ នាយករដ្ឋមន្ត្រីសៀម

**ព្រះវិហារ, ខ្មែរប៉ុស្តិ៍ : ស៊ីម សុភាឫទ្ធិ**

●●●បន្ទាប់ពីបរាជ័យផ្ទួនៗរបស់សៀម និងការរារាំងចុះបញ្ជីបេតិកភណ្ឌប្រាសាទព្រះវិហាររួមគ្នានៅប្រទេសអេស្ប៉ាញ កាលពីពេលថ្មីៗនេះ សៀមបានបង្កើនកងទ័ព និងបញ្ជូនគ្រឿងសព្វាវុធគ្រប់ប្រភេទ និងជីកលេណដ្ឋានត្រៀមលក្ខណៈប្រយុទ្ធនៃតំបន់ប្រាសាទព្រះវិហារ ។ ទង្វើនេះសៀមហាក់ដូចជាមាន ចេតនាចង់ផ្ទុះសង្គ្រាម ធ្វើការឈ្លានពានមកលើកម្ពុជាទាំងកម្រោល ។

អ្វីដែលគួរឱ្យភ្ញាក់ផ្អើលពីមួយថ្ងៃទៅមួយថ្ងៃនោះ ទាហានសៀមបានបង្កើនការយាមល្បាតចល័តអាវុធ រថពាសដែកពីចំណុចភូមិសាស្ត្រមួយទៅភូមិសាស្ត្រមួយ ។ ជាពិសេសនោះនៅចំណុចអូរចាក់ច្រែងក្បែរប្រាសាទព្រះវិហារកាលពីដើមខែឧសភា ដែលព្រឹត្តិការណ៍នេះបានជំរុញឱ្យកម្ពុជាប្រុងប្រៀបជើងការប្រុងប្រយ័ត្នខ្ពស់បំផុត ។

សកម្មភាពរបស់ទាហានសៀមនៅពេលនេះ បានធ្វើឱ្យមេបញ្ជាការកម្ពុជាប្រចាំការទិសជួរមុខនៃប្រាសាទព្រះវិហារដាក់បទបញ្ជាឱ្យទាហានរបស់ខ្លួនត្រូវតែត្រៀមជើងការគ្រប់ពេលវេលា ពីព្រោះទាហានសៀមបានចល័តអាវុធតូចធំយ៉ាងច្រើនខុសពីប្រក្រតី ។ ប៉ុន្តែជាសំណាងល្អ មេបញ្ជាការកងទ័ពនៃភាគីទាំងពីរបានធ្វើការចរចាគ្នាដើម្បីដោះស្រាយស្ថានការណ៍ឱ្យមានភាពធូរស្រាលឡើងវិញ ។

លោក ផា ជឿន មេបញ្ជាការនៅចំណុចអូរចាក់ច្រែង បានឱ្យដឹងថា កាលពីថ្ងៃទី5 ខែឧសភា កន្លងមកនេះ ពួកសៀមបានប្រើយុទ្ធសាស្ត្រចម្លែកក្នុងការចល័តទ័ព និងអាវុធហើយបានព្យាយាមចូលមកតំបន់ចំណុចស ។ ប៉ុន្តែខាងកម្ពុជាបានព្រមានមិនឱ្យចូលតមកទៀត ហើយសៀមក៏ដកថយទៅវិញ ។

លោកអនុសេនីយ៍ឯក ផា ជឿន បន្តថា ទ័ពសៀមពេលនេះដកថយទៅទីកដីរបស់គេអស់ហើយដែរ ចំណែកភាគីកម្ពុជាក៏បានបង្កើនការប្រុងប្រយ័ត្នក្នុងកម្រិតខ្ពស់រង់ចាំស្តាប់បទបញ្ជាពីថ្នាក់លើប៉ុណ្ណោះ ។ **តទៅទំព័រទី ១៤**

# វត្តព្រះពុទ្ធរង្សី នឹងការបញ្ចុះខណ្ឌសីមាដ៏អធិកអធម ថ្ងៃទី២៧_២៨ មិថុនា ២០០៩

*ដោយ : អ៊ុម លឿម*

●●●បន្ទាប់ពីបានបញ្ចប់ការសាងសង់ និងបានកែច្នៃផ្នែកខ្លះៗអស់រយៈពេលជាច្រើនឆ្នាំរួចមក ទើបវត្តដ៏ក្មេងខ្ចីដែលមានវ័យបាន ៦ឆ្នាំនឹងជាវត្តស្ថិតនៅចំកណ្តាលបេះដូងនៃសហគមន៍ខ្មែរ នាទីក្រុងហ្វីឡាដែលហ្វៀខាងត្បូងមួយនេះ បានប្រារព្ធពិធីបញ្ចុះខណ្ឌសីមា ដ៏អធិកអធមមួយក្នុងការបំពេញនូវលក្ខណៈសម្បត្តិ ជាអារាមសាសនាប្រយោជន៍ជាស្ថានសម្រាប់ពុទ្ធសាសនិកជនបានប្រណិបត្រនូវមាតាព្រះពុទ្ធសាសនាជាបន្តវៀងទៀត ។


ព្រះសង្ឃជយន្តោមុននឹងកាត់សីមា


ទទួលពរជ័យនៅពេលរៀបកាត់សីមា


ទិដ្ឋភាពបរិវេណព្រះវិហារ ដែលត្រូវបញ្ចុះសីមា

សាសនាពិធីដែលហៅថា "បុណ្យបញ្ចុះខណ្ឌសីមា" បែបនេះ ហាក់ពុំដែលធ្លាប់មានពីមុននៅលើទឹកដីនៃទីក្រុងហ្វីឡាដែលហ្វៀ ឡើយ ។

កម្មវិធីបុណ្យត្រូវបានប្រារព្ធធ្វើឡើងចំនួនបីថ្ងៃជាប់ៗគ្នា ដោយចាប់ផ្តើមតាំងតែពីរសៀលថ្ងៃសុក្រទី ២៦ ខែមិថុនា ឆ្នាំ ២០០៩ រហូតដល់រាត្រីថ្ងៃអាទិត្យទី ២៨ ទើបបញ្ចប់កម្មវិធី។ ព្រះសង្ឃជាច្រើនអង្គដែលនិមន្តមកពីបណ្តាវត្តជិតឆ្ងាយមួយចំនួនក្នុងសហរដ្ឋអាមេរិកបានជួបគ្នាដោយព្រះទ័យរីករាយក្នុងការគោរពធ្វើបុណ្យបញ្ចុះសីមានេះ ជាពិសេស គឺការនិមន្តចូលរួមជាអធិបតីពីសំណាក់ព្រះតេជគុណបណ្ឌិត ហុក សុវណ្ណ ដែលជាព្រះគ្រូចៅអធិការ មានកិត្តិនាមល្បីល្បាញនៅឯប្រទេសកាណាដា ។


ភ្លេងបុរាណខ្មែរ ក៏ចូលរួមបង្ហាញស្នាដៃយ៉ាងប៉ិនប្រសប់

ព្រះតេជគុណ យ៉េង សុធី កន្តធម្មោ ជាគ្រូសូត្រឆ្វេង ប្រចាំវត្តព្រះពុទ្ធរង្សី បានមានថេរៈដីការដល់ខ្មែរប៉ុស្តិ៍ថា ពិធីបញ្ចុះសីមានេះ ជាពិធីសម្ពោធឆ្លងអំពីសមិទ្ធផលដ៏ធំមួយនៅក្នុងវត្តអារាមនីមួយៗដែលគេហៅថា ព្រះវិហារ ។ តែបើសមិទ្ធផលនានាក្រៅអំពីព្រះវិហារវិញ ដូចជាកុដិ ឬក៏សាលាឆាន់ជាដើមនោះ គេមិនហៅថា បុណ្យបញ្ចុះសីមាឡើយ តែគេអាចហៅថា បុណ្យឆ្លងកុដិ បុណ្យឆ្លងសាលាឆាន់....វិញ ។


សិល្បះកំប្លែងជាន់ខ្ពស់ ព្រំ មាញ ក៏មកពីឡូវែល ចូលរួមកំដរបរិយាកាសដែរ

ព្រះតេជគុណដដែលមានថេរៈដីកាបន្តថា សម្រាប់រណ្តៅសីមាដែលគេធ្វើនៅក្នុងពិធីបញ្ចុះសីមានេះ គឺមាននៅគ្រប់ទិសទាំងប្រាំបី ក៏ប៉ុន្តែគេបន្ថែមរណ្តៅមួយទៀត ដោយសរុបទាំងអស់មានចំនួនប្រាំបួនដោយរណ្តៅទីប្រាំបួននេះគេហៅថា រណ្តៅកិល ហើយរណ្តៅកិលនេះ ជារណ្តៅសីមាតំណាងឱ្យរណ្តៅទាំងប្រាំបីទិស ។

សូមជម្រាបផងដែរថា ទីក្រុងហ្វីឡាដែលហ្វៀមានជនចំណាកស្រុកជាពលរដ្ឋខ្មែររស់នៅប្រមាណជា ២៥.០០០នាក់ និងមានវត្តខ្មែរសរុបទាំងអស់ចំនួនបួន ទី១ គឺវត្តព្រះពុទ្ធរង្សី ទី២ វត្តប៉ាឡេលេយ្យ ទី៣ វត្តព្រះពុទ្ធប្រទានពរ ដោយវត្តទាំងបីនេះស្ថិតនៅតំបន់ហ្វីឡាដែលហ្វៀខាងត្បូង។ ចំណែកទី៤ គឺវត្តសុរិយារង្សី ហើយវត្តនេះ ត្រូវបានគេស្គាល់ថា ជាវត្តខ្មែរ កម្ពុជាក្រោមមានទីតាំងលើវិថី Rishing Son AV នាតំបន់ហ្វីឡាដែលហ្វៀខាងជើង៕


កំសាន្តជាមួយតន្ត្រីសម័យ និងសិល្បករ ព្រំ មាញ

(តមកពីទំព័រទី ០៤)

## អតីតយុទ្ធជនស្ម័គ្រចិត្តត្រូវបាន...

Seanchour softly replies, "I never want to see this event happen".

In 1979 her commune was told to "run and go left in the woods". Run, run, run, they said and don't look back. Seanchour stayed in the Thailand camps for four years. She came to the United States and settled in New Orleans in September of 1984.

Seanchour now lives in Washington State with her husband and two children. She works for a local casino and operates a travel agency with her husband. Seanchour is currently the only female member of the United States Joint Services Command Khmer.

She hopes more will join and support this wonderful organization. She wants to remind women that they do not need to have any prior military experience or background. "I wanted to support my husband, the Khmer community, and America. Show some patriotism"!

### Hoeun Keo

Hoeun is man of burly physique and of charismatic personality. He walks with such pride and dignity and he has good reasons for them! Hoeun was born on March 3rd, 1950 in Kom Pong Cham, Cambodia. He is the eldest son of six siblings.

On April 14th, 1971, Hoeun joined the army. From 1971-1975, he fought against the Vietnamese army. Hoeun remembers finding money on eggplants in his family's farmland. The Khmer Rouge were initially trying to win over the people by acting like they cared about them. During this time, he began to patrol the perimeters of Highway 5, 3, and 6. In Watt Toul Sleng, he was informed that a civilian was caught hiding in the temple. The man was killed during the night for stealing a chicken!

Hoeun will always remember this phrase "sok a nah, kbal a ning". "It is your hair, it is your head". The Khmer Rouge would use this saying to imply that if you got caught stealing, then you are guilty and will be punished.

Hoeun immigrate to the United States and settled in Philadelphia, Pennsylvania. Hoeun is the proud parents of four boys.



He is currently a cook at the Pine Crest Country Club in Lansdale. "I am proud to be an American. I come from a military family. It was only natural that I am a member of the United States Joint Services Command". Hoeun is a Second Lieutenant and is very happy to have America as his home. "America is freedom. I feel proud".




**ដោយ : គឹម ភឿន** ***(តពីលេខមុន)***

●●● បុរសនោះ មិនមែនជាបុរសដែលអូនប្រាថ្នា ។

- ចុះគាត់មានបានជ្រាបពីបុរសដែលអូនស្រឡាញ់នោះទេ ?

- គាត់ពិតជាបានជ្រាបខ្លះៗ ពីរឿងនេះ ។ ពិសេសពេលគាត់ទាំងពីរនាក់មកលេងជាមួយលោកយាយ ជាមួយអូន ។ លោកយាយបានជម្រាបគាត់ពីរឿងនេះខ្លះៗដែរ ។ តែអ្នកទាំងពីរហាក់ដូចជាមានជំនោរចិត្តទៅលើកូនកម្លោះមិត្តភ័ក្ដិខ្លាំងទៅហើយ ។

កម្លោះ វិរៈ ដកដង្ហើមធំ នៅស្ងៀម តែចិត្តស្រងេះស្រងោចយ៉ាងខ្លាំង ។ នាងចង់ពង្រឹងស្មារតីកម្លោះបណ្ដូលចិត្តរបស់ខ្លួន :

ដូចអូនបានសរសេរជម្រាបបងថា ជីវិតមិនមែនមានភាពស្ងប់ស្ងាត់ជារៀងរហូត ដូចផ្ទៃទឹកបឹងក្នុងរដូវស្លឹកឈើជ្រុះនោះទេ ។ វាមានពេលខ្លះខ្យល់បក់បោក រលកប្រដេញទៅផ្ទប់ច្រាំងម្ដងហើយម្ដងទៀត ។ តែគង់មានពេលខ្លះស្ងប់ខ្យល់ ផ្ទៃទឹកស្ងាត់ល្អ មានតែកូនរលកតូចៗប្រដេញគ្នាយ៉ាងគួរឱ្យគយគន់ ។ រឿងសំខាន់ គឺការតស៊ូ អំណត់ព្យាយាម និងចេះរង់ចាំ ។

- បងខំប្រឹងរកឱកាសសុំលោកទាំងពីរ ភ្ជាប់ពាក្យអូនឱ្យបានឆាប់ដែរ ! បងនឹងខំឱ្យអស់ពីសមត្ថភាព ដែលខ្លួនអាចខំប្រឹងប្រែងបាន ។ នាងមើលមុខកម្លោះដោយអាណិតផង ស្រឡាញ់ផង និងយោគយល់ផង :

- សុំបងកុំព្រួយបារម្ភឱ្យសោះ សង្គ្រាម និងសត្រាវុធ បងមិនចុះចាញ់ បងទៅខ្លាចអ្វីសង្គ្រាមបេះដូង ។ នាងនិយាយរួច នាងសើចធ្វើហ៊ី ។

កម្លោះញញឹមតប :

- អូនដឹងទេ ណាប៉ូលេអុង ឈ្នះសង្គ្រាមអស់សឹងតែមួយអឺរ៉ុប តែលោកអធិរាជរូបនេះបានក្លាយទៅជាអ្នកអភ័ព្វស្នេហ៍ទៅវិញ ! ព្រោះស្រឡាញ់ប៉ះតែលើក្ដីស្នេហ៍មិនស្មោះ! ។

- ប៉ុន្តែបងច្បាស់មិនមែនជា ណាប៉ូលេអុង ព្រោះអ្នករង់ចាំបង ច្បាស់ណាស់ថា នឹងចាំទទួលសំបុត្រស្នេហារបស់បង ហើយនឹងឆ្លើយតបវិញភ្លាមៗ មិនទុកឱ្យបងក្ដុកក្ដួល ខ្សឹកខ្សួល និពន្ធតែលិខិតផ្ញើទៅ តែរង់ចាំដោយមួយម៉ឺនអាល័យ គ្មានលិខិតឆ្លើយតបនោះឡើយ ! ។

អ្នកកម្លោះញញឹមពេញចិត្តនឹងពាក្យសន្យាដ៏ផ្អែមល្ហែមរបស់នាង ។ មនោសញ្ចេតនាហាក់ដូចហែលហោះក្នុងភាពសុបិន្តមួយយ៉ាងអស្ចារ្យយ៉ាងព្រឺព្រួច ធ្វើឱ្យគេស្រវឹងក្នុងក្ដីស្រវឹងមួយដែលមិនបាច់សេពនូវគ្រឿងស្រវឹងសោះឡើយ ។

ក្រោយពេលទទួលទានបាយថ្ងៃត្រង់រួចហើយ កម្លោះ ច្រក តាយកុងតាក់ស៊ីថ្ងៃមុននោះ បានវិលមកចូលផ្ទះពីការដឹកភ្ញៀវ បានជួបវ៉ាក់អើនឹងលោកអនុសេនីយ៍ឯក វិរៈ កំពុងតែទទួលទានអាហារថ្ងៃត្រង់ជាមួយលោកយាយ និងបងស្រីរបស់ខ្លួន ព្រមនឹងនាយពលបាលឯកម្នាក់ទៀត ។ ស្រឡាំងកាំងមិនដឹងត្រូវនិយាយថាម៉េច ក៏នៅអឹមអៀនសម្លឹងភ្ញៀវ ។ ដឹងចិត្តប្អូនប្រុសរបស់ខ្លួន អ្នកគ្រូក៏បន្លឺឡើង :

- នែ ច្រក ក្រែងធ្លាប់ស្គាល់គ្នាហើយឬ ? ធ្លាប់ទាំងដឹកគាត់ទៅវត្តលង្កាថ្ងៃមុននោះអី ! មិនស្គាល់ទេឬ ? ទៅ ! ទៅយកចាន និងស្លាបព្រាមកញ៉ាំបាយជាមួយគ្នាទៅ ! ។

- ខ្ញុំញ៉ាំបាយផ្សារអង្គតាសោមរួចហើយបង កុំរវល់នឹងខ្ញុំអី ! ។

- កម្លោះតាយកុង ក៏លាអ្នកទាំងអស់ទៅបន្ទប់របស់ខ្លួន ។ តែនៅឮសំដីអ្នកគ្រូនិយាយពីក្រោយខ្នងខ្លួនយ៉ាងច្បាស់ថា : " ច្រក ត្រូវជាប្អូនជីដូនមួយរបស់អូន ឪពុកវាត្រូវជាប្អូនប្រុសរបស់ម្ដាយអូន " ។ តាំងតែពីលោកតាស្លាប់ទៅ វាបានមករស់នៅជាមួយលោកយាយ ដើម្បីមើលថែលោកយាយផង និងដើម្បីទៅរៀនផង ។ ឆ្នាំនេះវាបានរៀនដល់ថ្នាក់បញ្ចប់ហើយ នៅវិទ្យាល័យអង្គតាសោមនេះ ។ ដើម្បីឱ្យវារកលុយផ្គត់ផ្គង់ដល់ការរៀនសូត្ររបស់វា លោកយាយបានទិញរថយន្តមួយឱ្យរត់តាក់ស៊ី នៅពេលទំនេរពីការសិក្សា ។ វាពូកែសន្សំលុយណាស់ ហើយជាសិស្សពូកែក្នុងថ្នាក់ទៀតផង ។

កម្លោះ វិរៈ ក៏ឱទានឡើង :

- សមបាននៅជិតបងស្រីឧស្សាហ៍ទៅទៀត ប្អូនច្រក ច្បាស់ជាមានអនាគតល្អណាស់ ! ។

**សូមរង់ចាំអានភាគបន្តនៅលេខក្រោយ**

(តមកពីទំព័រទី ០១)

# ព្យួរអភ័យឯកសិទ្ធិ មូរ សុខហួរ...

ក្នុងការបញ្ចេញមតិនេះបានបង្កឱ្យមានប្រតិកម្មពីគណបក្សប្រឆាំង អង្គការសង្គមស៊ីវិល និងអ្នកការទូតយ៉ាងខ្លាំង ហើយបានហៅចំណាត់ការនេះថា ជាការបិទមាត់នៃសិទ្ធិសេរីភាព ក្នុងការបញ្ចេញមតិរបស់អ្នកតំណាងរាស្ត្រកាន់តែផុយស្រួយ ដែលធ្វើឱ្យអ្នកដទៃមិនហ៊ាននិយាយរិះគន់មន្ត្រីរដ្ឋាភិបាលដែលប្រព្រឹត្តិខុស ។ នេះគឺជាការបាត់បង់សិទ្ធិរបស់អ្នកតំណាងរាស្ត្រដែលជាអ្នកតំណាងឱ្យប្រជាពលរដ្ឋទៀតផង ។

ក្នុងសម័យប្រជុំដែលរឹតបណ្តឹងដោយកងកម្លាំងសន្តិសុខដើម្បីប្រឆាំងនឹងកុបកម្ម គឺមិនអនុញ្ញាតឱ្យអ្នកដទៃចូលរួមស្តាប់ឡើយ ។ ខណៈនោះមានសមាជិកសភាចំនួន111រូប ហើយ91រូបបានលើកដៃបោះឆ្នោតព្យួរអភ័យឯកសិទ្ធិ លោកស្រី មូរ សុខហួរ និងលោក ហូ វ៉ាន់ តំណាងរាស្ត្រគណបក្ស សម រង្ស៊ី លើសពី 2/3 ទៅទៀត ។

លោកស្រី មូរ សុខហួរ ប្រឈមមុខនឹងការចោទប្រកាន់ពីបទបរិហារកេរ្តិ៍ដែលធ្វើឡើងដោយនាយករដ្ឋមន្ត្រី ហ៊ុន សែន ហើយលោកស្រីក៏បានប្តឹង ហ៊ុន សែន មុនពីបទបរិហារកេរ្តិ៍ដែរ ប៉ុន្តែតុលាការបានតម្កល់សំនុំរឿងរបស់លោកស្រីចោល ។ ចំណែកលោក ហូ វ៉ាន់ ត្រូវបានចោទប្រកាន់ពីបទបង្ខូចកេរ្តិ៍ឈ្មោះ និងបទរិះគន់ពីសញ្ញាប័ត្របណ្ឌិតរបស់មន្ត្រីយោធាជាន់ខ្ពស់22នាក់ទទួលបានពីស្រុកយួន ។

លោក ជាម យៀប ប្រធានគណៈកម្មការហិរញ្ញវត្ថុនៃរដ្ឋសភាមកពីកូតាគណបក្សប្រជាជនកម្ពុជាបានថ្លែងប្រាប់អ្នកយកសារព័ត៌មានថា រឿងក្តីរបស់លោក ហូ វ៉ាន់ ត្រូវបានប្រធានរដ្ឋសភាសម្រេចដាក់បញ្ចូលក្នុងរបៀបវារៈ ហើយយើងក៏មិនចាំបាច់ប្រកាសបញ្ហានេះមុនកិច្ចប្រជុំដែរ ពីព្រោះវាជាបទប្បញ្ញត្តិផ្ទៃក្នុងរបស់រដ្ឋសភា។

លោក ជាម យៀប បានបន្តថា ការប្រជុំសម្ងាត់នេះ គឺធ្វើឡើងតាមការស្នើសុំរបស់សមាជិករដ្ឋសភាចំនួន54រូប ស្មើនឹង1/4 ហើយលោកមិនខ្វល់ចំពោះការតវ៉ារបស់អង្គការសង្គមស៊ីវិល



សម័យប្រជុំនៃរដ្ឋសភា សម្រេចដោយការលើកដៃ

ឬអ្នកការទូតចោទប្រកាន់ថាយ៉ាងណានោះទេ ។

លោក រ៉ុង ឈុន ប្រធានសមាគមគ្រូ បង្រៀនឯករាជ្យកម្ពុជា បានប្រាប់ក្រុមអ្នកសារព័ត៌មានថា អ្នកតំណាងរាស្ត្រខ្លួនឯងមិនអាចការពារបានផង តើទៅការពារគេកើតដែរឬទេ ? យកល្អតំណាងរាស្ត្រគណបក្ស សម រង្ស៊ី ទាំងអស់គួរតែដាក់ពាក្យលាឈប់ ដើម្បីប្រឆាំងនឹងការព្យួរអភ័យឯកសិទ្ធិនេះ ។

លោក គល់ បញ្ញា ប្រធានអង្គការខុម ហ្វ្រែល ដែលឃ្លាំមើលដំណើរការនៃការបោះឆ្នោតនៅកម្ពុជា បានសម្តែងនូវការសោកស្តាយចំពោះការព្យួរអភ័យឯកសិទ្ធិអ្នកតំណាងរាស្ត្រទាំងពីររូប ពីព្រោះអ្នកទាំងពីរគ្រាន់តែបញ្ចេញមតិ ទង្វើបែបនេះ វាបង្ហាញឱ្យឃើញកាន់តែច្បាស់នូវសិទ្ធិសេរីភាពក្នុងការបញ្ចេញមតិត្រូវស្រុតចុះដែលផ្ទុយពីប្រទេសអ្នកកាន់លទ្ធិប្រជាធិបតេយ្យក្នុងពិភពលោកនោះ ។

ចំណែកក្រុមអ្នកការទូតដែលចង់ទៅចូលរួមស្តាប់កិច្ចពិភាក្សានៃសម័យប្រជុំរដ្ឋសភា ក៏បានសម្តែងនូវការសោកស្តាយយ៉ាងខ្លាំង ។ លោកស្រី អេលីហ្សាបេត អ៊ីវ៉ាន់ អនុប្រធានទទួលបន្ទុកបេសកកម្មស្ថានទូតចក្រភពអង់គ្លេស បានប្រាប់ក្រុមអ្នកសារព័ត៌មានថា ក្រុមអ្នកការទូតមកពីអាមេរិក អង់គ្លេស បារាំង អាល្លឺម៉ង់មានការខកចិត្តខ្លាំងណាស់ ដោយសារគេពុំអនុញ្ញាតឱ្យចូលស្តាប់កិច្ចប្រជុំ ហើយពួកយើងក៏មិនយល់ពីមូលហេតុរបស់ពួកគេដែរ ។

បន្ទាប់ពីសមាជិកសភាគណបក្សប្រជាជនកម្ពុជា, គណបក្សហ៊្វុនស៊ិនប៉ិច និងគណបក្សនរោត្តម រណឫទ្ធិ លើកដៃគាំទ្រដកអភ័យឯកសិទ្ធិរបស់អ្នកតំណាងរាស្ត្រទាំងពីររួចមកសមាជិកសភាគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស ដែលមានពាក់ម៉ាស់ខ្មៅនៅមាត់ជាសញ្ញានៃការបំបិទសិទ្ធិសេរីភាពនៃការបញ្ចេញមតិ បានដើរចេញពីសម័យប្រជុំ ហើយបានផ្តល់នូវកិច្ចសម្ភាសន៍ដល់ក្រុមអ្នកសារព័ត៌មាននៅខាងក្រៅបរិវេណរដ្ឋសភា ។

លោកស្រី មូរ សុខហួរ បានប្រាប់ក្រុមអ្នកសារព័ត៌មានថា សភាបានលើកដៃដក អភ័យឯកសិទ្ធិលោកស្រីនិងលោក ហូ វ៉ាន់ វាជារឿងអយុត្តិធម៌ធ្ងន់ធ្ងរខ្លាំងណាស់ ពួកគេពុំបានពិចារណាលើផលប្រយោជន៍ជាតិឡើយ ។ ពួកគេគិតតែប្រយោជន៍បក្សគាំទ្រនាយករដ្ឋមន្ត្រី ហ៊ុន សែន ទោះបីជាគាត់និយាយប៉ះ ពាល់ដល់កេរ្តិ៍ឈ្មោះ និងតួនាទីរបស់ខ្ញុំជាសមាជិករដ្ឋសភាក៏ដោយ ។

លោកស្រី មូរ សុខហួរ បន្តថា រដ្ឋសភាជារបស់យើងទាំងអស់គ្នា ឬរបស់គណបក្សប្រជាជនកម្ពុជា ពេលនេះសញ្ញាណលទ្ធិប្រជាធិបតេយ្យបានធ្លាក់ចុះហើយ ។ ប្រទេសយើងកំពុងប្រឈមមុខនឹងគ្រោះថ្នាក់ផ្នែកប្រព័ន្ធតុលាការមិនគោរពច្បាប់ ធ្វើការតាមការអំពាវនាវអ្នកធំដែលជាការគ្រោះថ្នាក់បំផុតរបស់យើងទាំងអស់គ្នា ។

ចំណែកលោក ហូ វ៉ាន់ បានឱ្យដឹងថា លោកមានការភ្ញាក់ផ្អើលខ្លាំងណាស់ នៅពេលសភាដកអភ័យឯកសិទ្ធិរបស់លោក លោកក៏បានបញ្ជាក់ថារឿងក្តីរបស់លោកបានសម្រុះសម្រួលគ្នា និងធ្វើការកែតម្រូវអស់ហើយ មិននឹកស្មានដល់សោះ ។ ទោះបីជាយ៉ាងណា ក្តីរបស់ខ្ញុំក៏ដូចជាលោកស្រី មូរ សុខហួរ នឹងបន្តតាមប្រព័ន្ធតុលាការទៀត ។

អង្គការសង្គមស៊ីវិលក្នុងស្រុក និងសហជីពសេរីកម្មករ បានចេញសេចក្តីថ្លែងការណ៍ថ្កោលទោសចំពោះសេចក្តីសម្រេចដកអភ័យឯកសិទ្ធិលោកស្រី មូរ សុខហួរ និងលោក ហូ វ៉ាន់ ថាធ្វើឱ្យប៉ះពាល់យ៉ាងខ្លាំងចំពោះលទ្ធិប្រជាធិបតេយ្យ និងសេរីភាពនៃការបញ្ចេញមតិនៅកម្ពុជា ។

ថ្លែងក្នុងពិធីនៅខេត្តកណ្តាល ហ៊ុន សែន បានបញ្ជាក់ថា តំណាងរាស្ត្រ2រូប ត្រូវបានសភាព្យួរអភ័យឯកសិទ្ធិដើម្បីឱ្យតុលាការកាត់ទោស ប៉ុន្តែមុនពេលកាត់ទោសត្រូវដកអភ័យឯកសិទ្ធិរបស់ពួកគេជាមុនសិន **តទៅទំព័រទី ១៤**






យន្តហោះ B-777

របស់ក្រុមហ៊ុន " អាកាសចរ អ៊ីវ៉ាអ៊ែរ " នាំដំណើរ លោកអ្នក ទៅកាន់ ទ្វីបអាស៊ី និង ទីកន្លែងផ្សេងទៀត

## ពី ទីក្រុង ញូយ៉ក (Newark) ឆ្ពោះទៅកាន់ ទីក្រុង តៃប៉ិ (Taipei) ហោះហើរ ៤ ជើង ក្នុងមួយសប្តាហ៍

ចាប់ពី ថ្ងៃទី ៦ ខែ សីហា ឆ្នាំ ២០០៩ ការធ្វើដំណើរទៅកាន់ទ្វីបអាស៊ីរបស់លោកអ្នក នឹងរឹតតែងាយស្រួល ដោយការហោះហើររបស់ ក្រុមហ៊ុន អាកាសចរ អ៊ីវ៉ាអ៊ែរ ពីទីក្រុង ញូយ៉ក (Newark) ទៅកាន់ ទីក្រុង តៃប៉ិ (Taipei) នៅរៀងរាល់ ថ្ងៃ ចន្ទ. ពុធ. ព្រហស្បតិ៍ និង ថ្ងៃ សៅរ៍ ។

យន្តហោះប្រភេទថ្មី B777 ដែលមានកន្លែង. កៅអី ធំទូលាយ និង បំពាក់ដោយបច្ចេកវិទ្យាថ្មីទំនើប ត្រូវបានបែងចែកជា ៣ លំដាប់ គឺ លំដាប់ថ្នាក់ពិសេស (Premium Laural). ថ្នាក់ប្រណីត (Elite Class) និង ថ្នាក់ធម្មតា (Economy Class) ។

ពហុនិការ ( អ្នកបំរើលើយន្តហោះ) ដ៏រួសរាយរាក់ទាក់របស់យើង និង ផ្តល់ជូន លោកអ្នក នូវការធ្វើដំណើរ ក្នុងបរិយាកាស ដ៏ស្ងប់ស្ងាត់ រីករាយ និង កក់ក្តៅ ។









EVA Wings – Booking, Buying and Bonuses just a click away at www.evaair.com

Contact us at our local service hotline: 800-695-1188

## AMERICAN LEGION POST 153 PRESENTS



## FRANTIC

DJ FRIDAY AND SATURDAY
FROM 9 P.M. – 3 A.M.
MEMBERS ONLY
SMOKING PERMITTED

សូមអញ្ជើញមកកំសាន្ត ពិសារភេសជ្ជៈ
រាំកំសាន្តនៅ "ហ្វ្រេនទិក"

2514 S. 24TH ST.
PHILA., PA 19145
215-551-1950

## បន្ធូរបរិយាកាសយ៉ាងត្រជាក់ចិត្ត បន្ទាប់ពីធ្វើការងារហត់នឿយ !

- កន្លែងកំសាន្តធំទូលាយ-ស្តាប់ភ្លេងយ៉ាងពិរោះអស្ចារ្យ ឬក៏បុកប៊ីយ៉ា ក៏មានជូនកំសាន្តដែរ ។
- យើងខ្ញុំរីករាយណាស់នឹងឃើញលោក-អ្នកអញ្ជើញមក !
- ថ្ងៃសុក្រ-សៅរ៍ ពីម៉ោង៩ដល់ម៉ោង៣ព្រឹក **DJ** នឹងបណ្តែតអារម្មណ៍ លោក-អ្នកតាមតន្ត្រីសំរាំងថ្មីៗ





**ចង់ជួលសាល ឬចង់បានម្ហូប ជប់លៀង យើងធ្វើជូនបាន !**

HALL RENTAL & CATERING
AVALIABLE REASONABLE PRICE



## NEW ASIA AMERICA TRAVEL, INC.

### Domestic & International Travel Services

Serve all major airlines: បំរើលោកអ្នកដោយក្រុមហ៊ុនអាកាសចរសំខាន់ៗជាច្រើន
Tours-cruises រៀបចំដំណើរកំសាន្ត "ទួ" តាមនាវាចរ
Reentry permits/visa លិខិតអនុញ្ញាត "រីអិនទ្រី ភើមីត"
Passport photos រូបថតយកលិខិតឆ្លងដែន
Honeymoon packages – specials ទេសចរណ៍ក្នុងពិធីរៀបការថ្មីថ្មោងពិសេស
Single paper
Special Group Tours រៀបចំធ្វើដំណើរពិសេសជាមួយក្រុម
Walt Disney 4-8 days ដំណើរទៅ "វ៉ាល់ឌីសណេ" ៤-៨ថ្ងៃ
Las Vagas 4-7 days ដំណើរទៅ "ឡាសវេហ្គាស" ៤-៧ថ្ងៃ
California 7-10 days ដំណើរទៅ "កាលីហ្វ័រញ៉ា" ៧-១០ ថ្ងៃ
Hawaii 6-14 days ដំណើរទៅ "ហាវ៉ៃ" ៦-១៤ថ្ងៃ
Caribbean –Mexico ដំណើរទៅ "ខារីប៊ិន-មិកស៊ិក"
Europe 7-21 days ដំណើរទៅ "អឺរ៉ុប" ៧-២១ថ្ងៃ
Asia: China, Hong Kong, ដំណើរទៅអាស៊ី :ចិន,ហុងកុង
Singapore, Malaysia, ដំណើរទៅ សិង្ហបុរី
Thailand, Cambodia 10-21 days. ដំណើរទៅប្រទេសថៃ-កម្ពុជា ១០-២១ថ្ងៃ
Money Transfer (Vietnam only) ផ្ញើការផ្ញើប្រាក់ (ប្រទេសវៀតណាមប៉ុណ្ណោះ)
Citizenship test ធ្វើតេស្តសំរាប់ចូលសញ្ជាតិ
Pin and Pinless phone cards. មានកាតទូរស័ព្ទ មានលេខសម្ងាត់ ឬគ្មាន

Dung Phat Plaza Tel: (215) 468-7876
1110 Washington Ave., #6 Fax: (215) 468-7917
Philadelphia, PA 19147 E-mail: info@naatravel.com
www.newasia-americatravel.com

(តមកពីទំព័រទី ០១)

## បក្សប្រឆាំងខ្មែរបង្ហាញពីយុទ្ធសាស្ត្រ..

បានធ្វើសន្និសីទសារព័ត៌មានមួយផ្តល់ជូនសាធារណជន ស្តីពីនយោបាយនៅកម្ពុជា ហើយជាពិសេស ស្តីពីសម្ព័ន្ធភាពអ្នកប្រជាធិបតេយ្យ ដើម្បីផ្លាស់ប្តូរ ។

កិច្ចប្រជុំដែលមានរយៈពេលមួយម៉ោងកន្លះ ដឹកនាំដោយ ថាច់ សុបិន ។

លោក សម រង្ស៊ី ប្រធានគណបក្ស សម រង្ស៊ី បានផ្តើមសេចក្តីថ្លែងការណ៍ថា " ចង់ពិគ្រោះគ្នាពីគម្រោងរួមគ្នា ដើម្បីរំដោះកម្ពុជា ឱ្យចេញផុតពីការគ្រប់គ្រងរបស់យួន ឱ្យកម្ពុជាមានឯករាជ្យ និងឱ្យកម្ពុជាមានការដឹកនាំតាមលទ្ធិប្រជាធិបតេយ្យ " ។ លោកបន្តថា " លោកចង់ឃើញខ្មែរនៅឯនាយសមុទ្រ ជាមហាគ្រួសារតែមួយ ចង់ឱ្យមានការអាចបោះឆ្នោតបាន ទៅលេងស្រុកទេសដោយគ្មានការខ្មាសអៀន ឬភ័យខ្លាច នៅកម្ពុជាពេលនេះ បងប្អូនពុំបានទទួលកិត្តិយសនេះ ពីនយោបាយសព្វថ្ងៃនេះទេ ដោយសារតែអ្នកនៅក្នុងស្រុកមានការគោរពបងប្អូន នៅឯនាយសមុទ្រ ចំពោះការបានរៀនសូត្រ ចំពោះការងារប្រកបមុខរបរចិញ្ចឹមជីវិតខ្ពង់ខ្ពស់ និងចំពោះការចិញ្ចឹមជីវិតអ្នកនៅក្នុងស្រុក ដូច្នេះ សូមបងប្អូនមុននឹងទៅកម្ពុជាវិញ ប្រើឥទ្ធិពលនេះ ដោយប្រើទូរស័ព្ទ ឬអាំងទើណេត ឬទំនាក់ទំនងផ្សេងៗ ដើម្បីជាការចូលរួមតស៊ូជាមួយនឹងយើងខ្ញុំ ក្នុងបុព្វហេតុកម្លាំងរួបរួមប្រជាធិបតេយ្យ កម្លាំងស្នេហាជាតិ ដើម្បីយកជ័យជំនះក្នុងការបោះឆ្នោតនៅឆ្នាំ ២០១៣ ។

រីឯលោក កឹម សុខា ប្រធានគណបក្សសិទ្ធិមនុស្ស បានផ្តើមសេចក្តីយ៉ាងនេះថា " ថ្ងៃនេះរាប់បានថា ជាប្រវត្តិសាស្ត្រ ដែលបងប្អូនបាត់មុខមួយរយៈពីការតស៊ូចំពោះប្រទេសជាតិ ឥឡូវនេះខ្ញុំឃើញត្រឡប់មកវិញអស់ហើយ ខ្ញុំសូមថ្លែងអំណរគុណដល់ទឹកចិត្តតស៊ូរបស់បងប្អូន ដើម្បីលទ្ធិប្រជាធិបតេយ្យ និងសេរីភាពកម្ពុជា នាពេលកន្លងមកនេះ ចាប់តាំងពីឆ្នាំ១៩៧៩មក ដោយមានការតស៊ូនៅក្នុងប្រទេស ហើយគាំទ្រយ៉ាងខ្លាំងក្លាពីបងប្អូននៅក្រៅប្រទេសប្រឆាំង និងវត្តមានយួន ខ្ញុំជឿថា បើគ្មានករណីនេះទេ ថ្ងៃនេះយើងគ្មានខ្មែរទៀតទេ យើងមិនជឿថា យួនចេញដោយសារគេចង់ចេញនោះទេ គឺប្រាកដជាដោយសារគេតស៊ូពីខាងក្នុងប្រទេស និងការគាំទ្រពីក្រៅប្រទេសនោះហើយ ទាំងនោះគឺជាវីរភាពដ៏ធំធេង ដែលខ្ញុំសូមអញ្ជើញបងប្អូនបន្តវីរភាពនេះតទៅទៀត ពីព្រោះអ្វីដែលយើងចង់បាននោះ យើងឥតទាន់បាននៅឡើយទេ ដូចជា ឯករាជ្យ និងបូរណភាពទឹកដីជាដើម ដែល បានបាត់បង់ដោយសារមហិច្ឆតាអ្នកដឹកនាំ ដែល ចង់បានអំណាចផ្តាល់ខ្លួន ទៅពឹងបរទេស ដែល ស្រេកឃ្លានទឹកដីខ្មែរ ។ ប្រវត្តិសាស្ត្រខ្មែរបាននិយាយថា " ប្រជាពលរដ្ឋខ្មែរ ចង់បានលទ្ធិប្រជាធិបតេយ្យ បានបោះឆ្នោតឱ្យគណបក្សប្រជាធិបតេយ្យ ឆ្នាំ ១៩៤៦ តែត្រូវមេដឹកនាំរំលាយសភាចោល ដល់បោះឆ្នោតឆ្នាំ ១៩៤៧ គណបក្សប្រជាធិបតេយ្យរឹតតែឈ្នះខ្លាំងឡើង មកដល់ឆ្នាំ ១៩៥១ ក៏ដូចគ្នានោះទៀត ក៏ប៉ុន្តែការដឹកនាំពុំបានផ្តល់នូវអ្វីដែលរាស្ត្រប្រាថ្នាគ្រប់ជំនាន់នោះទេ" ។ លោក កឹម សុខា បន្តថា "ការដឹកនាំប្រទេសថ្ងៃនេះ គឺដោយសារគណបក្សប្រជាជន ដែលមានដើមកំណើតពីកុម្មុយនិស្តបង្កើតឡើងដោយយួនកុម្មុយនិស្ត ហូជីមិញ ហើយបានអំណាចដោយការបន្តុបរបស់យួនហាណូយ កុម្មុយនិស្ត ដែលបន្តអំពើផ្តាច់ការនៅកម្ពុជា ដូច្នេះ ខ្ញុំសូមអញ្ជើញបងប្អូនបន្តការតស៊ូរបស់បងប្អូនជាមួយយើងតទៅទៀត ដើម្បីបំណងប្រាថ្នារបស់ពលរដ្ឋខ្មែរ ដែលថ្ងៃនេះ ពុំទាន់បានសម្រេចផលនៅឡើយ គឺលទ្ធិប្រជាធិបតេយ្យ សេរីភាព និងឯករាជ្យភាព ។

លោក យ៉ែម ប៉ុណ្ណារិទ្ធ តំណាងរាស្ត្រខ្មែរមកពីគណបក្សសិទ្ធិមនុស្ស បានថ្លែងបន្តពីប្រធានគណបក្សទាំងពីរថា " អ្នកកាន់អំណាចពុំចង់ចែករំលែកការគ្រប់គ្រងជាតិទេ ដូច្នេះមានតែអ្នកប្រជាធិបតេយ្យ ត្រូវតែកសាងករណីនេះដោយរួបរួមគ្នា ពេលនេះយើងដឹងហើយថា ឥទ្ធិពលយួន មកលើកម្ពុជា គឺពីដើម គេធ្វើខ្មែរឱ្យទៅជាយួន ដែលជាការលំបាកមួយ ឥឡូវនេះ គេធ្វើយួន ឱ្យទៅជាខ្មែរវិញ គឺយើងពិបាកទប់គេហើយ កម្ពុជាអាចនឹងបាត់បង់នៅពេលយើងកំពុងរស់បើកភ្នែកស្រស់នាពេលនេះ ។ លោកបន្តថា " យើងជួបជុំគ្នាថ្ងៃនេះ ព្រោះយើងចង់ឃើញទឹកដីខ្មែរនៅគង់វង្ស ចង់ឃើញអរិយធម៌ខ្មែរនៅរស់ដដែល ចង់ឃើញកូនខ្មែរ នៅតែកូនខ្មែរ ហើយសេចក្តីសង្ឃឹមរបស់ខ្ញុំ គឺចង់ឃើញខ្មែររួបរួមគ្នាទាំងក្រុង និងក្រៅប្រទេស ទាំងក្មេង និងចាស់ ទាំងព្រះសង្ឃ និងគ្រហស្ថ ទើបអាចដណ្តើមជ័យជំនះពីអ្នកកាន់អំណាចសព្វថ្ងៃនេះបាន" ។

**ជិន វុទ្ធា :** បានស្នើទៅអ្នកនយោបាយខ្មែរថា " សូមឱ្យអ្នកនយោបាយខ្មែរ ជួយមកខ្មែរ-អាមេរិកាំងវិញផង ទើបអាចបង្កើនកម្លាំងពួកយើងខាងអាមេរិកនេះ ឱ្យទៅជួយផ្នែកនយោបាយវិញបាន ឧទាហរណ៍ ដូចជាជួយខ្មែរនៅអាមេរិកនេះ ឱ្យចេញទៅបោះឆ្នោត ។ល។"



**អ៊ូ តិមហួត :** បានស្នើថា " ពលរដ្ឋខ្មែរ ដែលចូលរួមការតស៊ូ ដោយសារសេចក្តីសង្ឃឹម បើសង្ឃឹមមានតិចដូចពីមុន មកទៅបោះឆ្នោតក៏មានតិច រីឯយើងនៅឯនាយសមុទ្រ ចង់ទៅជួយ ក៏ជួយបានតិច ដូច្នេះត្រូវរៀបចំទិសដៅប្តូរសកម្មភាពរបស់អ្នកនយោបាយ



តទៅទំព័រទី ២០




# Nationwide

Insurance & Financial Service

សេវាធានារ៉ាប់រង និងហិរញ្ញវត្ថុ

We offer Cheap Price for Every Client

យើងធ្វើជូនគ្រប់ភ្ញៀវដោយតម្លៃថោក

| | |
|---|---|
| Business Liability Insurance | ធានារ៉ាប់រងជំនួញលោកអ្នក |
| Home Insurance | ធានារ៉ាប់រងផ្ទះសម្បែង |
| Health Insurance | ធានារ៉ាប់រងសុខភាព |
| Auto Insurance | ធានារ៉ាប់រងរថយន្ត |
| Life Insurance | ធានារ៉ាប់រងជីវិត |

Discount 30% when you purchase Home & Auto Insurance

ចុះតម្លៃ ៣០ % បន្ថែមបើលោកអ្នកទិញ ធានារ៉ាប់រងផ្ទះ និងរថយន្តរួមគ្នា

South Philadelphia office:
600 Washington Ave Suite #8
Philadelphia, Pa 19147
Tel: (215) 463-1257
Fax: (215) 463-2036

North Philadelphia office:
6603 Bustleton Ave.
Philadelphia, Pa 19149
Tel: (215) 335-2140
Fax: (215) 335-2147

# The Noni Juice

ទឹកផ្លែមផ្លែ "ណូនី" ខ្មែរហៅផ្លែ "ញ" ត្រូវគេចងចាំថា ឪពុកម្ដាយ ឬជូនតា ធ្លាប់យកផ្លែ "ញ" នេះទៅត្រាំស្រា ហើយពិសារជាថ្នាំព្យាបាលការឈឺចុកចាប់នានា បណ្ដាលឱ្យមានកម្លាំង-ចុះកម្លាំងឈាម ។ល។ ឥឡូវនេះ អ្នកវិទ្យាសាស្ត្រខាងពេទ្យរកឃើញថា ផ្លែ "ញ" នេះ បើប្រើឱ្យសមត្ថភាពលាយជាតិគីមីនឹងធ្វើឱ្យចុះសម្ពាធឈាមបន្ថយការឈឺសន្លាក់ដៃជើងព្យាបាលជំងឺទឹកនោមផ្អែម-ធ្វើឱ្យមានកម្លាំង និងជួយរំលាយអាហារទៀតផង។

សូមទាក់ទងតាមឈ្មោះ និងទូរស័ព្ទខាងក្រោម ដើម្បីជាវទឹកផ្លែម "ណូនី"




Philadelphia: David: 215-268-4821 or Jason: 215-805-3396

Rhode Island: Hui Le: 401-640-5158

Lowell: Samran: 508-216-6062

The Noni Jucie is made by traditional method, 100% pure, and no preservation. It can help decrease high blood pressure; reduce arthritis pain, diabetes, increase body energy level and digestion system.










320 W. Oregon Avenue. Suite 1. Philadelphia, Pa 19148

Tel. 215-952-6688

Open: 7 days a week. Sunday – Thursday: 9a.m.–9 p.m.
Friday & Saturday: 9a.m. –10 p.m.

បើកទទួលភ្ញៀវរៀងរាល់ថ្ងៃចាប់ពីម៉ោង ៩ ព្រឹក ـ ម៉ោង ៩ ល្ងាច លើកលែងតែថ្ងៃសុក្រ និងសៅរ៍ បើករហូតដល់ ១០ យប់





- យើងមានមុខម្ហូបសំរាប់ពិសារបាយ មាន គុយទាវ មាននំបញ្ចុក ហើយ ជាពិសេសមានធ្វើ "ហ្វឺ" គ្រប់មុខ ជូនពិសារយ៉ាងឈ្ងុយឆ្ងាញ់
- បុគ្គលិកយើងខ្ញុំនិយាយភាសាខ្មែរ រងចាំបំរើអតិថិជនមិនឱ្យខុសបំណងឡើយ










# ទំព័រហ្វីឡាដែលហ្វៀ

## ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ដោយ : ពិន សំខុន** *តពីលេខមុន*

**២៦ ធ្នូ** : តាមការអំពាវនាវរបស់ សីហនុ រដ្ឋមន្ត្រីខ្លះបានលាលែង តែរដ្ឋាភិបាលឥតរំលាយទេ ។

**២៨ ធ្នូ** : សមាជជាតិទី២៨ និងចុងក្រោយរបស់សង្គមរាស្ត្រនិយម ។

**ឆ្នាំ ១៩៧០**

**ថ្ងៃ៦ មករា** : នៅពេលដែល លន់ នល់ នៅប្រទេសបារាំងនៅឡើយ- សម្ដេច សីហនុ ចេញដំណើរទៅប្រទេសបារាំង ។

**៣ កុម្ភៈ** : លោក អ៊ុំ មាន្នូរិន រដ្ឋលេខាធិការក្រសួងការពារជាតិលើផ្ទៃប្រទេស និងជាប្អូនថ្លៃរបស់ សីហនុ ត្រូវជាប់ចោទពីបទរត់ពន្ធខុសច្បាប់ដ៏សំខាន់មួយ ។

**១៨ កុម្ភៈ** : លន់ នល់ ត្រឡប់មកកម្ពុជាវិញ ។

**២៧ កុម្ភៈ** : សម្ដេច សីហនុ ប្រកាសព្រះរាជបំណងធ្វើដំណើរទៅកាន់ប្រទេស រុស្ស៊ី បន្ទាប់មកទៅប្រទេសចិន ដើម្បីទាមទារឱ្យយួនកុម្មុយនិស្ត ដកទ័ពចេញពីកម្ពុជា ។

**៨-៩ មីនា** : បាតុកម្មប្រឆាំងនឹងយួនជម្រុញដោយក្រុមយោធានៅស្វាយរៀង ។

**១១-១៦ មីនា** : បាតុកម្មប្រឆាំងយៀកកុងវៀតណាម ហាណូយ បាតុករបានវាយស្ថានទូតហាណូយ និងយៀកកុង នៅភ្នំពេញ ជនជាតិយួនជាច្រើនរយនាក់បានត្រូវសម្លាប់ ។

**១២ មីនា** : បាតុករវាយកំទេចបណ្ណាគារ ហុងយូ ដែលបានទទួលសិទ្ធិលក់ផ្ដាច់មុខនូវសម្ភារៈសិក្សាពីសម្ដេច សីហនុ -រដ្ឋាភិបាលទាមទារឱ្យហាណូយ ដកទ័ពចេញមុនថ្ងៃ ១៥ មីនា ហើយលប់ចោលនូវកិច្ចព្រមព្រៀងដឹកសម្ភារៈយោធាតាមកំពង់ផែក្រុងព្រះសីហនុ - សីហនុ បន្ទោសរដ្ឋាភិបាល និងសភាដែលបានគាំទ្រក្រុមបាតុករ - រដ្ឋាភិបាលគាំទ្រដោយព្រះមហាក្សត្រីយានី ជាព្រះមាតារបស់ សីហនុ ឱ្យបញ្ជូន ប្រតិភូទៅពិនិត្យមើលពីស្ថានការណ៍ក្នុងស្រុក- សីហនុឆ្លើយបដិសេធមិនទទួលប្រតិភូរដ្ឋាភិបាល និងសភាទេ ។

(តទៅលេខក្រោយ)

# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

**ដោយ : អ៊ុម លឿម**
**(តពីលេខមុន)**

❖រូបភាព និងរឿងដើមជាភាសាថៃដោយ គុណាបាយុតា
❖បកប្រែជាភាសាចិន ដោយ ភិក្ខុ ជែន ហាយ
❖បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី
❖ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី
❖បកប្រែជាភាសាខ្មែរ ដោយភិក្ខុ គង់ អាំ



❖Original Illuatration and Naration in Thai by Gunapayuta.
❖Translation into Chinese by Bhikkhu Jan Hai.
❖Translation into English by Z.A Lu.
❖ Coloring by Yann-Fang Lee
❖Translation into Khmer by Bhikkhu Kong Am.

**៣០-** នៅនគរកបិលភស្តុ នាចុងបំណាច់នៃគិម្ហន្តរដូវ ដែលគេចាំបានថា ជារដូវដែលប្រជាកសិករដល់ពេលធ្វើស្រែ ។ ព្រះមហាក្សត្រសុទ្ធោទនៈ និងពួកមន្ត្រីព្រះបរមរាជវាំង បានប្រារព្ធធ្វើបុណ្យច្រត់ព្រះនង្គ័លនៅខាងក្រៅព្រះរាជធានី ទៅតាមទំនៀមទម្លាប់ ។ ជារៀងរាល់ឆ្នាំបុណ្យច្រត់ព្រះនង្គ័លនេះ ជាពិធីបុណ្យមួយដ៏ធំ ។ ប្រជាជនក្នុងរាជធានីទាំងមូលនាំគ្នាចេញមកមើលព្រះមហាក្សត្រទ្រង់ច្រត់ព្រះនង្គ័ល និងដើម្បីកំសាន្តសប្បាយក្នុងពិធីបុណ្យដ៏មហោឡារិកនោះ ។ នៅថ្ងៃនោះ ព្រះសិទ្ធត្ថកុមារទ្រង់បានយាងទៅកាន់ពិធីនោះជាមួយនឹងព្រះបាទសុទ្ធោទនៈជាព្រះវររាជបិតាផងដែរ ។



**៣១-** ព្រះមហាក្សត្រទ្រង់ប្រារព្ធកម្មវិធី ។ ព្រះអង្គទ្រង់ចាប់កាន់នង្គ័លមាស ដែលតាក់តែងយ៉ាងល្អឆើត រួចទ្រង់ក៏ចាប់ភ្ជួរ ។ ពួកមន្ត្រីទាំងឡាយនាំគ្នាភ្ជួរតាមក្រោយព្រះអង្គ ដោយនង្គ័លតុបតែងលំអដោយប្រាក់ ។ ក្រោយគេបំផុត គឺពួកប្រជាកសិករ ដោយភ្ជួរនង្គ័លរបស់ខ្លួនផ្ទាល់ ។ ផ្ទាំងដីពណ៌ក្រមៅដ៏រឹងត្រូវគេរាស់បំបែក បន្ទាប់មកគេប្រុងប្រៀបធ្វើការសាបព្រួសពូជដំណាំ ។

(តទៅលេខក្រោយ)

**30 -** In Kapilavastu, the end of summer marked the season for the farmers to start tilling.King Suddhodana and his officials customarily led the royal Tiller Fastival outside the city. Every year this was a big cermony. The people of the city all come out to see the King plowing the land and to enjoy the very colorful feast. On this day also, Prince Siddhartha accompanied King Suddhodana to the ceremony.

**31-** The King began the ceremony in the field, He raised beautifull decorated gold plow and began to plow the land. A group of officials followed him, plowing the land with silver-decorated plows, Finally, there came the farmers, two in the row, using their own plow. The stiff brown mud was loosened and was then ready for seeding.



(continue Issue After)

(តមកពីទំព័រទី ០៥)

## តំបន់ប្រាសាទព្រះវិហារ...

បើយោងតាមសម្តីរបស់មន្ត្រីយោធាដែលប្រចាំការនៅតំបន់នោះ ហើយខ្លាចមេកើយ ពិន័យបានឱ្យដឹងថា នេះជាល្បិចកលរបស់សៀម ក្នុងការដណ្តើមយកតំបន់អូរចាក់ច្រែង ដែលទីនោះអាចមើលឃើញចំណុចផ្សេងនៅតំបន់ប្រាសាទព្រះវិហារ និងមានបំណងកាន់កាប់ដូច ជានៅតំបន់វាលឥន្ទ្រីយ៍ ភ្នំទ្រព្យ និងចំណុច5 មករា ពីព្រោះវាមានទីតាំងភូមិសាស្ត្រល្អក្នុងយុទ្ធសាស្ត្រសង្គ្រាម ។


កាំភ្លើងយន្តរបស់សៀម តម្រង់មកទឹកដីខ្មែរ



ប្រភពខាងលើបន្តថា ការចល័តអាវុធអមដោយទាហានរាប់រយនាក់របស់សៀមនេះ វាគ្រាន់តែជាលេសដើម្បីចង់ឈ្លានពានទឹកដីកម្ពុជា ប៉ុន្តែត្រូវភាគីខ្មែរយល់ និងដឹងពីល្បិចកលអស់ហើយ ។ តំបន់អូរ-ចាក់ច្រែងនេះគ្មានផ្លូវឡើង គឺត្រូវស្វូរតាមវល្លិ៍ដើម្បីឡើងដល់ចំណុចនោះ ប៉ុន្តែវាល្អសម្រាប់ការប្រយុទ្ធគ្នាទៅវិញ ។

តាមកាសែត The Nation របស់សៀម បានស្រង់សម្តីរបស់លោក អាប់ភីស៊ិត បានធ្វើការអំពាវនាវដល់សហគមន៍អន្តរជាតិ ឬអង្គការអន្តរជាតិនានា កុំលូកដៃចូលក្នុងបញ្ហាប្រាសាទព្រះវិហារ ព្រោះវាជាប់ពាក់ព័ន្ធនឹងបូរណភាពទឹកដីរបស់សៀម ។

ជាមួយគ្នានេះដែរ នាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន បានថ្លែងជាសាធារណៈមុនពេលការមកដល់របស់ លោក ស៊ូថេប ឧបនាយករដ្ឋមន្ត្រីសៀម ថា ការមកពន្យល់បែបណាមួយក៏ដោយ បើទាក់ទងនឹងបញ្ហាប្រាសាទព្រះវិហារ គ្មានអ្វីត្រូវស្តាប់ការពន្យល់នោះទេតែត្រូវនិយាយពីការដកកងទ័ពសៀម ចេញពីទឹកដីកម្ពុជា ។

នាយករដ្ឋមន្ត្រីខ្មែរ បានបញ្ជាក់ថា នៅពេលនេះបើសិនជាទាហានសៀម ហ៊ានរំលោភចូលបុរណភាពទឹកដីកម្ពុជា ប្រាកដជាមានបញ្ហាហើយ ។ យើងបានត្រៀមគ្រប់លក្ខណៈ ដើម្បីគ្រប់គ្រងស្ថានការណ៍នៅតាមតំបន់ព្រំដែន ប្រសិនបើមានការឈ្លានពីកងទ័ពសៀមនោះ ។

បើតាមសេចក្តីរាយការណ៍ពីតំបន់ប្រាសាទព្រះ-វិហារ កាលពីថ្មីៗនេះថា លោក វីប៊ុនសាក់ នីផាត មេ-បញ្ជាភូមិភាគកងទ័ពសៀម បានដាក់បទបញ្ជាយ៉ាងតឹងរ៉ឹងដល់កងទ័ពរបស់ខ្លួន ត្រូវតែមានការប្រុងប្រយ័ត្នខ្ពស់ ដោយរំពឹងថា អាចនឹងមានការផ្ទុះអាវុធជាយថា-ហេតុនៅពេលខាងមុខនេះ ៕

(តមកពីទំព័រទី ០៨)

## ព្យួរអភ័យឯកសិទ្ធិ មួរ សុខហួរ...

គឺយើងធ្វើនេះដើម្បីពង្រឹងនីតិរដ្ឋ។

ជាមួយគ្នានេះដែរ ហ៊ុន សែន ក៏បានព្រមានចំពោះជនបរទេសមួយចំនួនមិនចំណោះឱ្យស្ថិតនៅក្រៅឆាកនយោបាយកម្ពុជា បើពុំនោះទេនឹងត្រូវប្រឈមមុខបញ្ហាផ្លូវច្បាប់ ។ ការព្រមានជាសាធារណៈនេះគេពុំទាន់ដឹងច្បាស់ថា មន្ត្រីស្ថាន-ទូតណានោះទេ ទោះបីជាយ៉ាងណាមានអ្នកខ្លះសន្និដ្ឋានថា ទំនងជាក្រុមមន្ត្រីស្ថានទូតដែលចង់ទៅចូលរួមក្នុងពេលសភាប្រជុំដកអភ័យឯកសិទ្ធិតំណាងរាស្ត្រទាំង2 ។ ហ៊ុន សែន បានព្រមានទាំងក្រេវក្រោធថា បើជនបរទេសចង់លេងជាមួយច្បាប់ខ្មែរយើងនឹងមានច្បាប់ផ្សេងទៀតដើម្បីដោះស្រាយជាមួយពួកគេវិញ ។

លោក ស៊ូយ៉ា ភីស៊ូប៊ីឌី អ្នករាយការណ៍ពិសេសរបស់អង្គការសហប្រជាជាតិ ទទួលបន្ទុកសិទ្ធិមនុស្សនៅកម្ពុជា បានថ្លែងនៅក្នុងសន្និសីទសារ-ព័ត៌មានថា បញ្ហាជាច្រើនកំពុងប្រឈមមុខនៅកម្ពុជាដូចជាបញ្ហាសិទ្ធិមនុស្សបណ្តេញប្រជាពល-រដ្ឋចេញពីដីធ្លី ផ្ទះសម្លេងសិទ្ធិបញ្ចេញមតិ សេរី-ភាព ប្រមូលផ្តុំប្រព័ន្ធតុលាការមិនឯករាជ្យ និងការបែងចែកអំណាចក្នុងរដ្ឋាភិបាល រដ្ឋសភាមិនទាន់ច្បាស់លាស់ ។

លោក ស៊ូយ៉ា ភីស៊ូប៊ីឌី បន្តថា បញ្ហាសិទ្ធិមនុស្សមិនគ្រាន់តែជាបញ្ហាផ្ទៃក្នុងរបស់កម្ពុជា ទេ ប៉ុន្តែវាជាការធ្វើសច្ចាប័នលើអនុសញ្ញា កតិកាសញ្ញាជាអង្គការសហប្រជាជាតិទៀតផង ។

អភ័យឯកសិទ្ធិរបស់អ្នកតំណាងរាស្ត្រ ប្រៀបដូចជាអាវក្រោះសម្រាប់មេទ័ពពាក់ ដើម្បីធ្វើសឹកសង្គ្រាមជាមួយនឹងសត្រូវក្នុងសមរភូមិ ប៉ុន្តែពេលនេះត្រូវបានគេដកចេញ ។ ដូច្នេះអ្នកតំណាងរាស្ត្រងាយនឹងគ្រោះថ្នាក់មិនអាចការពារ


លោក ស៊ូយ៉ា ភីស៊ូប៊ីឌី

ខ្លួនឯងបានទេ តើទៅការពារពលរដ្ឋយ៉ាងម៉េចបាន ? ពេលនេះពលរដ្ឋខ្មែរ ក៏ដូចជាសហគមន៍ជាតិអន្តរជាតិ មានប្រតិកម្មព្រមៗគ្នា ហើយសម្តែងនូវការខកចិត្តយ៉ាងខ្លាំងពេលឃើញសភាពការបែបនេះ ។

ជាមួយនឹងការក្រៀមក្រំខាងលើនេះ ក៏មានអ្នកស្រុកខ្លះបាននិយាយថា ស្រុកខ្មែរ អ្វីក៏អាចធ្វើកើតដែរ អ្វីដែលពិភពលោកធ្វើមិនកើត ស្រុកខ្មែរអាចធ្វើបានដោយងាយ គឺឱ្យមានវត្តមាន-របស់ ហ៊ុន សែន បន្តដឹកនាំប្រទេសនោះ ៕



# រីករាយទិវាបុណ្យរំលឹក ឯករាជ្យ U.S.A. ៤ កក្កដា

**ដោយ : ម៉ម យ៉ឺន**

ប្រវត្តិសាស្ត្រចែងយ៉ាងច្បាស់ហើយ    ចងចាំជាតិអើយគ្រប់រូបា
គឺថ្ងៃទី៤ ខែកក្កដា    រាល់ឆ្នាំប្រាប់ថា ថ្ងៃឯករាជ្យ ។
ថ្ងៃនេះ ជាថ្ងៃថ្លៃពិសេស    អាមេរិកប្រទេសដ៏អង់អាច
ឆ្នាំ១ពាន់ប្រាំពីររយស្រេច    ចិតប្រាំមួយផ្តាច់ជាថ្ងៃបុណ្យ ។
ចាប់ផ្តើមប្រារព្ធគ្រប់រាល់ឆ្នាំ    មានជាប់ប្រចាំត្រៀមទុកមក
ទាំងចិត្តទាំងកាយទាំងមូលធន    ចូលរួមធ្វើបុណ្យ១ឆ្នាំម្តង ។
អាមេរិកាំងទាំងប្រទេស    មានថែមពិសេសជាតិផ្សេងផង
ចូលមករស់នៅសុខក្សេមក្សាន្ត    ជាប្អូនជាបងសែនសប្បាយ ។
ថ្ងៃបួនកក្កដា បានចូលដល់    មនុស្សគ្រប់មណ្ឌលសែនរីករាយ
នាំគ្នាជួបជុំយ៉ាងក្អាកក្អាយ    ទាំងចិត្តទាំងកាយដើរហែក្បួន ។
ក្បួននេះផ្តើមធ្វើគ្រប់ទីក្រុង    គ្រប់រដ្ឋទាំងស្រុងសុទ្ធត្រៀមខ្លួន
នាំគ្នាចូលរួមព្រមសមសួន    ដើរហែរជាក្បួនសែនល្អក្រៃ ។
មានដើរជាជួរតួរគយគន់    មានទាំងរថយន្តតុបតែងឆ្នៃ
បង្ហាញឱ្យឃើញនូវស្នាដៃ    ដ៏ល្អប្រពៃនៃអាមេរិក ។
ទិដ្ឋភាពដ៏ស្រស់រស់រវើក    ដើម្បីជួយលើកឡើងជានិច្ច
ឱ្យយើងចងចាំកុំឱ្យភ្លេច    ថាជាតិអាមេរិកដូចពេជ្រសុទ្ធ ។
ក្បួនហែរមានជាប់ជាបន្ត    សប្បាយសាទរសែនល្អផុត
ដើរដោយសង្ហារយ៉ាងមោះមុត    ខ្លះរាំពេនពាត់តាមតន្ត្រី ។
តន្ត្រីប្រគំឮកឹងកង    ខ្សែវខ្វាកន្លងពិរោះក្រៃ
មានជាសង្វាក់ញាក់ជើងដៃ    គួរឱ្យរំពៃក្រៃកន្លង ។
ក្បួនដង្ហែរមានដ៏យ៉ាងវែង    មានអមដោយភ្លេងដោយគឹតកង
បង្ហាញឱ្យមនុស្សពេញចិត្តផង    ១ឆ្នាំមានម្តងត្រូវសប្បាយ ។
រីករាយសាទរអរខ្លាំងណាស់    ទាំងក្មេងទាំងចាស់សាសន៍ទាំងឡាយ
បានចូលរួមហើយនាំចិត្តកាយ    ប្រសើរពណ្ណរាយក្នុងជីវិត ។
ក្បួនដង្ហែរធំពេញមួយថ្ងៃ    ទទួលពរជ័យពីព្រះពិត
នាំគ្នាបន្លឺពាក្យពិសិដ្ឋ    ជូនពរជ័យរិទ្ធិអាមេរិកា ។
ការដង្ហែរក្បួនបានចប់ទៅ    តែបន្សល់នូវក្តីសុខា
នៅមានបន្តល្ងាចនោះណា    នាំគ្នាយាត្រាទៅជួបជុំ ។
រង់ចាំទស្សនាបាញ់កាំជ្រួច    ផ្កាភ្លើប្រៀបដូចបុប្ផាធំ
អណ្តែតលើមេឃដូចប្រគុំ    ឮសូររងំពេញវេហាស៍ ។
កាំជ្រួចបាញ់ឡើងចេញម្តងៗ    សម្លេងហោកងពេញភារា
ស្រែកជូនពរជ័យដ៏ថ្លៃថ្លា    សូមអាមេរិកា បានព្រះពរ ។
កាំជ្រួចបាញ់ឡើងជាប់ជានិច្ច    ភ្លឺថ្លាដូចពេជ្រជាបន្ត
ផ្ទះឮក្តុងក្តាំងគ្មានឈប់ឈរ    ដូចស្រែកជូនពរមនុស្សប្រុសស្រី ។
កាំជ្រួចឡើងទៅចេញពន្លឺ    រស្មីបន្លឺពេញផែនដី
ជាពន្លឺចាំងប្រាប់លោកីយ    ឱ្យតាំងស្មារតីចិត្តស្រឡាញ់ ។
ប្រមាណ១ម៉ោងបាញ់កាំជ្រួច    ចេញផ្កាភ្លឺដូច ធ្លាក់មកវិញ
ជាផ្កាពរជ័យលើពាសពេញ    អាមេរិកាមិញ ចេញពរជ័យ ។
កាំជ្រួចបានចប់តែមានត    វេទិកាបវរមានតន្ត្រី
មានអ្នកច្រៀងពិរោះក្រៃ    មានប្រុសមានស្រីកងរំពង ។
អ្នកស្តាប់ឈរពេញជួយបន្ទរ    ខ្លះរាំ ខ្លះឈរ ខ្លះសារចង
សប្បាយខ្លាំងណាស់ដូចបំណង    ដែលបានចាំចងថ្ងៃឯករាជ្យ ។
ថ្ងៃបុណ្យឯករាជ្យពិសេសណាស់    ជាប្រវត្តិសាស្ត្រផ្តល់អំណាច
ដល់អាមេរិកាំងចិត្តអង់អាច    ទាមទារគ្មានខ្លាំងពីអង់គ្លេស ។
ប្រវត្តិសាស្ត្រនេះប្រពៃណាស់    បានជ័យជាក់ច្បាស់រកគ្មានទេ
ធ្វើឱ្យអាមេរិកបានជួបតែ    ខ្លាំងក្លាពូកែតរៀងមក ។
នាពេលសព្វថ្ងៃគ្មានប្រួលប្រែ    មានជាប់ស្ថិតស្ថេរបង្ហាញលោក
ឱ្យឃើញហើយនាំគ្នាយក    រស់នៅកោនជ្រកសុខសាន្តអើយ ។
សូមព្រះប្រទាននូវពរជ័យ    បវរថ្លាថ្លៃប្រកបដោយ
សេចក្តីថ្លៃថ្នូពោរពេញហើយ    អាមេរិកអើយបានពរជ័យហោង ៕

សូមព្រះជាម្ចាស់ប្រទានពរជ័យដល់ប្រទេស និងពលរដ្ឋអាមេរិកាំង ។
រីករាយថ្ងៃបុណ្យឯករាជ្យ ! សូមអរគុណ !

## តមកពីទំព័រទី ០១ រំលឹកពីរដ្ឋប្រហារឆ្នាំ1997បញ្ចប់...

ដែលលួចលាក់និងក្រុមខ្មែរក្រហមចូលប្រទេស និងការទិញអាវុធខុស ច្បាប់ជាដើម ។



រដ្ឋាភិបាលចម្រុះជាមួយគ្នា គឺគណបក្សហ៊្វុនស៊ិនប៉ិច ដែលឈ្នះឆ្នោតក្រោមការគ្រប់គ្រងដោយអង្គការសហប្រជាជាតិឆ្នាំ 1993 បានច្រានចោលការចោទប្រកាន់ ដោយបញ្ជាក់ថា រាល់សកម្មភាពការងារទាំងឡាយគឺដើរតាមគោល-ការណ៍ស្របច្បាប់របស់រដ្ឋាភិបាលកម្ពុជា ក្នុងនាមសហនាយករដ្ឋមន្ត្រីទី1 និងសហនាយករដ្ឋមន្ត្រីទី2 ដែលបានកំណត់គោលការណ៍រួម ។ គណបក្សប្រជាជនកម្ពុជាតែងរកហេតុផលដើម្បីចោទប្រកាន់បង្កទំនាស់ដើម្បីបន្ទុះអាវុធដាក់គ្នា ។

សង្គ្រាមបង្ហូរឈាមក្នុងរយៈពេលមួយចំអិនកំពីសកាលពីថ្ងៃទី5-6 ខែកក្កដា ឆ្នាំ 1997 ត្រូវបានពួកអ្នកវិភាគ និងក្រុមអ្នកស្រាវជ្រាវប្រវត្តិ-សាស្ត្រ រួមទាំងអង្គការសិទ្ធិមនុស្សអន្តរជាតិបានកំណត់ត្រា និងគូសវាសថា ការផ្ទុះអាវុធដាក់គ្នារវាងកងទ័ពរបស់សម្តេចក្រុមព្រះ និងលោក ហ៊ុន សែន គឺជាចេតនាដែលកម្លាំងទ័ពដ៏សម្បើមមហិមារបស់លោក ហ៊ុន សែន ក្នុងការបង្ក្រាបដើម្បីបញ្ចប់កម្លាំងទ័ពហ៊្វុនស៊ិនប៉ិច ឱ្យរលត់រលាយជាជំហានដំបូង ក្នុងដំណាក់កាលឈានទៅរកការបញ្ចប់កម្លាំងនយោបាយហ៊្វុនស៊ិនប៉ិច ដើម្បីឱ្យចុះខ្សោយ ឬបាត់ស្រមោលពីឆាកនយោបាយប្រកួតប្រជែងជាមួយគណបក្សប្រជាជនកម្ពុជា ។

ព្រឹត្តិការណ៍បង្ហូរឈាមកាលពី12ឆ្នាំមុននោះ បើតាមរបាយការណ៍របស់អង្គការសិទ្ធិមនុស្សសហប្រជាជាតិបានបង្ហាញថា មានពលរដ្ឋ និងកម្លាំងយោធាទាំងសងខាងបានស្លាប់បាត់បង់ជីវិតប្រមាណ1000នាក់ ហើយទ្រព្យសម្បត្តិអ្នកស្រុកនៅទីក្រុងភ្នំពេញ ត្រូវបាត់បង់ ព្រោះតែក្រុមកម្លាំងយោធា-ប៉ូលិសខិលខូចមួយចំនួនបានលួចឆក់ប្លន់ក្រោមលេស "ជ័យលាភីក្នុងសង្គ្រាមសមរភូមិ" ។

បញ្ហាដែលបង្កឱ្យរីករាលដាលរហូតឈានដល់ការប៉ះទង្គិចអាវុធដាក់គ្នាដែលមានការចោទប្រកាន់ថា ជាអំពើរដ្ឋប្រហារផ្តួលរំលំ ឬបណ្តេញសហនាយករដ្ឋមន្ត្រីទី1 គឺព្រះអង្គម្ចាស់ នរោត្តម រណឫទ្ធិ ចេញពីតំណែង ដែលចេញពីហេតុផលទំនាស់ដូចជាបញ្ហារឿងខ្មែរក្រហមការទិញអាវុធសំរាប់កងការពារសម្តេចក្រុមព្រះនរោត្តម រណឫទ្ធិ ក្នុងនាមសហនាយករដ្ឋមន្ត្រីទី1 ។ ទាំងនេះត្រូវបានលោក ហ៊ុន សែន ចោទប្រកាន់ថាល្មើសច្បាប់ត្រូវតែបង្ក្រាបដើម្បីរក្សាសណ្តាប់ធ្នាប់សន្តិសុខសង្គម ៕

## កំសាន្តស្នាដៃខ្មី ឆ័ត្រក្រហម

*ដោយ : ខុសុម អុង*

●●●លោក ឆៃ សំបូ ជាតារាចំរៀងដ៏ល្បីក្នុងក្រុង បូសស្ទន់ ជាបុរសម្នាក់មាននិស្ស័យខាងសិល្បះ ហើយលោកចេះលេងស្គរឆៃយ៉ាំផងដែរ ។ លោកមានទេពកោសល្យដូចជីតាលោកអញ្ចឹង តែទាស់លោកសំបូ នៅកម្លោះចាស់ មានអាយុ ៣៧ ឆ្នាំ ហៅថាកម្លោះចាស់សម័យដុល្លារ តែមិនទាន់ដាក់ចិត្តដាក់កាយលើកូលាបណាទេ ។

ព័ត៌មានថ្មីៗបានឮកាន់តែខ្លាំងឡើងថា លោកបានលួចប្រតិព័ន្ធលើកញ្ញា ចន្ទ្រា - នាងចន្ទ្រា ជាកូនកំព្រាឪពុក មានតែម្តាយ នាងជានារីដ៏ស្រស់ប្រិមប្រិយម្នាក់រស់នៅហ្វីឡាដែលហ្វីយ៉ា ។ នាង និយមក្រងសក់ ហើយនិយមច្រៀងបទមនោសញ្ចេតនា តែមិនទាន់មានសេចក្តីស្នេហានៅឡើយដែរ ។

ថ្ងៃបុណ្យភ្ជុំបិណ្ឌ នាងកាន់ឆ័ត្រពណ៌ក្រហមបាំងបិតដួងភក្ត្រារបស់នាង រីឯហត្ថាបានកាន់ចានស្រាក់ពណ៌ស មានបាយ សម្លកកូ សាច់ត្រីអណ្តែងសំដៅទៅវត្ត ។

នាងចន្ទ្រា បានដឹងមុនថា នាងប្រាកដជាជួបបុរសម្នាក់នៅពេល ១ ម៉ោងទៀត នាងមានសច្ចំកាន់ឬអ្វី ? បានឱ្យនាងដឹងមុខ អ៊ីចឹងហើយបានជាក្រោយមកនាងបានឈប់លេងភ្លេង ឈប់រាំទៀតហើយ ។

មុខផ្ទះនាងមានដាំដើមកូលាបពណ៌ស្វាយ ឯនាងនិយមក្រងសក់ជូនកាលទម្លាក់មកលើស្មាយ៉ាងសង្ហា កន្លង់ដ៏ក្មេងម្នាក់កំពុងផ្តោតអារម្មណ៍ ពេលនាងបាំងឆ័ត្រក្រហមម្តងៗ ។

គេបានស្គាល់នាង ពេលនាងច្រៀងកាលពីឆ្នាំ ១៩៩៩ ស្រាប់តែឆ្នាំ ២០០២ ឮថា នាងឈប់ច្រៀង គេខកចិត្តណាស់ ។ សព្វថ្ងៃនាងបានចេះទាយដ៏ល្បីល្បាញ នាងមានងារជានារីឆ័ត្រក្រហម ត្បិតក្រហមស្រស់សមនឹងសាច់សផងថែមទៀត ។ នាងចន្ទ្រា ហៅ ឪរ៉ា បានសំរេចឥតយកគូគ្រងទេ នាងស្រឡាញ់ភាពភក្តីស្មោះស្ម័គ្រ និយាយត្រង់ សុភាពរាបសា ស្រឡាញ់ញាតិមិត្តជានិច្ច ។

ថ្ងៃមួយពេលភ្លៀង មានព្រិល នាងបានទាញឆ័ត្រក្រហមមកប្រើ តែត្រូវបាក់ដង នាងស្តាយណាស់ ព្រោះឆ័ត្រនោះមានដងរូបតោខ្មៅជាសញ្ញា នេះនាំឱ្យនាងដឹងថា នាងប្រាកដជាបែកពីម្តាយ ព្រាត់ស្លាប់ជាប្រផ្នូលដ៏អាក្រក់ ។

ក្រោយនាងសុបិន្តឃើញ នេត្រាឡើងបាយពណ៌ស ១ខែក្រោយម្តាយបានរអិលជើងនៅក្នុងអាងទឹក ពេលហ្នឹងឡានពេទ្យបានដឹកម្តាយយកទៅព្យាបាល ។ ផ្ទះនាងចន្ទ្រា នៅមិនឆ្ងាយពីមន្ទីរពេទ្យ អែងស្តែងប៉ុន្មានទេ ។

១អាទិត្យកោយមកម្តាយនាងបានចេញពីពេទ្យ កន្លង សំបូ បានទិញតុយទាវទឹកពីហាង ៣ថ្ងៃជាប់គ្នា ប្រគល់ឱ្យនាងយកទៅបញ្ចុកម្តាយយ៉ាងថ្នមចិត្តជាទីបំផុត ។

នាងចន្ទ្រា បានដឹងថា ម្តាយនាងរស់ឥតបានយូរទេ ម្តាយនឹងត្រូវក្ស័យព្រោះរោគទឹកនោមផង ។ ចាប់តាំងពីឆ្នាំ ២០០៦ មក នាងចន្ទ្រា ពុំបានទៅអង្គុយឱ្យចិត្តស្ងប់ទេ ស្រាប់តែស្រម័យឃើញបុរសមាឌធំមាំបាននាំម្តាយនាងទៅឯកន្លែងមួយ ទីនោះមានផ្កាភ្ញីច្រើនណាស់ ។

៣ខែក្រោយមក ម្តាយបានប្រកាច់ស្លាប់ដឹកទៅពេទ្យមិនទាន់ ។ ក្រោយពីបូជាសពមក នាងមានទុក្ខក្រៀមក្រំ ហើយបានបោះបង់ចោលបាយសីនៅក្នុងបន្ទប់គេងរបស់នាង រួចរីក្តាហ៊ុំងចោលអស់ ។

តាំងពីពេលនោះមក នាងឈប់ទស្សន៍ទាយ ហើយវិលត្រឡប់ទៅស្រុកកំពុងព្រែក ខេត្តកំពុងចាម ហើយក៏ចូលបួសជាដូនជី ៕

# ហោរាសាស្ត្រប្រចាំ ថ្ងៃទី ៨_២២ កក្កដា



### ឆ្នាំជូត : (ពពួកទេព្តាប្រុស ធាតុទឹក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏មិនត្រូវធ្វើទាំងចិត្តតក់ក្រហល់ដោយខ្វះការពិចារណានោះឡើយ ព្រោះ បើមានការភ្លាំងភ្លាត់តែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕



### ឆ្នាំមមី : (ពពួកទេព្តាស្រី ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើ ត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕



### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់ទំនិញសព្វសារពើ ចូរចេះពិនិត្យគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍មានរឿងរកាំរកូសច្រើន ៕



### ឆ្នាំមមែ : (ពពួកទេព្តាស្រី ធាតុមាស)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ។ ចំពោះអ្នករកស៊ីជួញដូរក្នុងរយៈពេលនេះនឹងមានទ្រព្យហូរចូលប្រៀបដូចត្រូវឆ្នោត ព្រោះមានទំនិញលក់ចេញទិញ ចូលឥតទំនេរដៃ ។ ចំពោះគូស្នេហ៍ក្នុងពេលនេះកាន់តែប្រកបដោយភាពផ្អែមល្ហែម ៕



### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវចេះគ្រប់គ្រងទ្រព្យឱ្យបានគង់វង្ស ជាពិសេសអ្នករកស៊ីជួញដូរហាមបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ឱ្យអតិថិជនជំពាក់បំណុលច្រើន ព្រោះអាចនឹងខាតបង់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនសូវបានសុខកាយសប្បាយចិត្តទេ ព្រោះមានរឿងរកាំរកូសច្រើន ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺតែងទទួលបាននូវផលសម្រេចជាប់ជានិច្ច ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយមិនថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺប្រកបតែសេចក្តីសុខ ព្រមទាំងអាចរកចំណូលចូលផ្ទះយ៉ាងគាប់ចិត្តទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានការយល់ចិត្តគ្នាល្អណាស់ ៕



### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គ ត្រូវបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចរកស៊ីជួញដូរបានពេញដៃពេញជើង ហើយទោះជាបានជួបនឹងគូប្រជែងជើងខ្លាំងចេញមកតតាំងក៏មិនភ័យព្រួយដែរ ព្រោះលោកអ្នកអាចយកប្រៀបឈ្នះជានិច្ច ។ រយៈពេលនេះចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេមក្សាន្ត ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះលោកអ្នកនឹងបានជួបនូវគូប្រជែងជើងខ្លាំងចេញមុខមកតតាំង ដូច្នេះចូរចេះរៀបចំជើងព្រួលទុកសម្រាប់ទប់ទល់ជាមុន ទើបមិនលិចលង់ទាន់តែហាមដាច់ខាតការប្រើកម្លាំងបាយដោះស្រាយបញ្ហា ព្រោះវាបានត្រឹមតែខាតបង់ទាំងសងខាងតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ៕



### ឆ្នាំរោង : (ពពួកទេព្តាប្រុស ធាតុមាស)

រាសីរបស់លោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះអ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងចំពោះជនខិលខូចដែលនៅក្បែរៗលោកអ្នក ព្រោះពួកគេមានគំនិតប៉ុនប៉ងធ្វើអំពើអាក្រក់ដោយមិនចេញមុខ ដូច្នេះត្រូវមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះទោះជា លោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះការចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្តោងធំដែរ គឺបានត្រឹមតែចំណាយពេល វេលា និងកម្លាំងឥតអំពើ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ធ្មត់ទើបទទួលបានសេចក្តីសុខ ៕



### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អជាធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដី ធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខ ពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អគួរលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែទើបឈានចូលឆ្នាំថ្មី ហើយរាល់កិច្ចការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះៗក្តី តែកុំភ័យព្រួយអ្វីឡើយ ព្រោះលោកអ្នកអាចរកដំណោះស្រាយបានជ្រះស្រឡះទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលមកជ្រៀតជ្រែក ៕

## សោភណភាព

# ទប់ស្កាត់អាការស្បែកមុខឡើងអាចម៍រុយ

●●● ជាធម្មតាស្បែករបស់មនុស្សខ្លះពេលប្រឈមនឹងកំដៅថ្ងៃ នឹងបង្កឱ្យកើតមានអាការឡើងអាចម៍រុយបានដោយងាយ ។ ជាងនេះទៅទៀតការត្រាំត្រែងនឹងកំដៅថ្ងៃក៏អាចធ្វើឱ្យអាចម៍រុយនេះពង្រីកខ្លួនកាន់តែធំឡើងទៀតផង ។ អ្វីដែលធ្ងន់ធ្ងរជាងនេះទៅទៀតសម្បុរក៏កាន់តែខ្មៅផងដែរ ។ ប្រសិនបើយ៉ាងដូច្នេះ យើងងាកមកមើលពីវិធីការពារទាំងអស់គ្នាដូចខាងក្រោមនេះ :

អ្នកអាចធ្វើបានដោយសារជាតិចម្រាញ់ពីវីតាមីន A ដែលគេបានពិសោធន៍រួចមកហើយ ឃើញថា វាអាចជួយឱ្យស្បែករាបស្មើគ្នាល្អ ។ តែប្រសិនបើអាការអាចម៍រុយនេះកើតឡើងនៅត្រង់បរិវេណសម្បុរជាំខ្មៅនោះ វាចាំបាច់បំផុត ដែលអ្នកត្រូវប្រើក្រែមទៅតាមវេជ្ជបញ្ជារបស់គ្រូពេទ្យ ។

សំរាប់វិធីការពារកុំឱ្យស្នាមអាចម៍រុយនេះ ផុសចេញមកម្តងទៀតនោះ អ្នកគួរប្រើម្សៅពាក់ និងប្រើក្រែមការពារកំដៅថ្ងៃប្រភេទការពារទឹក មានកំរិត SPF ១៥ ដើម្បីការពារកាំរស្មី UV ដែលមកបង្កទុក្ខព្រួយដល់ស្បែកមុខរបស់អ្នក ៕

# មានអ្វីប្លែកនៅហ្វីឡាដែលហ្វីយ៉ា

### ១- ពី ស៊ីម៉ាក SEAMAAC នៅផ្លូវលេខ ៧

●●● " សមាគមអាស៊ីអាគ្នេយ៍ " នេះបានបើកទ្វារប្រមាណជាង១ឆ្នាំសោះ នៅផ្លូវលេខ ៧ ខាង ត្បូង តំបន់ដែលមានខ្មែរ លាវ រស់នៅច្រើន ឥឡូវនេះ ត្រូវបានបិទទ្វារកាលពីសប្តាហ៍កន្លងទៅនេះហើយ ។ មតិជាច្រើនយល់ថា ដោយសារវិបត្តិថវិកាចុះខ្សោយ តម្រូវឱ្យខ្វះថ្លៃឈ្នួលផ្ទះ និងខ្វះថវិកាឱ្យបុគ្គលិកធ្វើការ ។ ក៏ប៉ុន្តែ ស្រាប់តែសេចក្តីប្រកាសផ្សព្វផ្សាយរបស់សហជីពបុគ្គលិក " ស៊ីម៉ាក " បែរជានិយាយប្លែកពីនោះទៅវិញ គឺ : បុគ្គលិកច្រើននាក់មានឋានៈតាំងពីអនុប្រធាន រហូតដល់បុគ្គលិកធម្មតា ត្រូវបានលាលែងពីតំណែង ឬត្រូវបញ្ឈប់ ដោយលប់ការងារចោល ។ ខាងក្រោមនេះជាសម្តីរបស់ប្រធានសហជីពចុះផ្សាយក្នុងព្រឹត្តិបត្រ "AFSCME Local net" កាលពីខែ ឧសភា ២០០៩ :

**By Frederick Wright**

We heard testimony about how emoployees were terminated and disciplined without any justification; employees having to word consistently over forty-hours a week without compensation; and employees being placed on performance probation for two years. After reviewing SEAMAAM´s policies and procedures manual, we discovered all employee benefits including pay rates were at the sole dicretion of the Executive Director. His managemant style was both oppressive and authoritative. He often over-ruled directive given by his supervisors to staff at his whim.

### ២. ពីសមាគមព្រឹទ្ធាចារ្យខ្មែរ

សមាគមព្រឹទ្ធាចារ្យខ្មែរ ដែលមានទីស្នាក់ការនៅផ្លូវលេខ ៧ ខាងត្បូង ហ្វីឡាដែលហ្វៀ ត្រូវបានប្រជាពលរដ្ឋតាំងសំនួរជាច្រើន ពីដំណើរការសហគមមនុស្សចាស់ ដែលមានឈ្មោះថា CASA នេះ ។ សំនួរនាឱកាសបុណ្យបញ្ចុះសីមា នាវត្តព្រះពុទ្ធវង្សី នេះនិយាយថា " ឮថាសមាគមព្រឹទ្ធាចារ្យ មានការឈ្លោះគ្នា តើរឿងនេះ វាដល់ណាហើយ ? "

គ្មានថ្នាក់ដឹកនាំណាម្នាក់មានបំណងជំរះចម្ងល់របស់សាធារណជននោះនៅឡើយទេ ។ ខ្មែរប៉ុស្តិ៍ បានស្វែងរកចំលើយជូនលោកអ្នកអានក្នុងវគ្គទី១នេះ ដូចតទៅ : ឆ្នាំ ២០០៩ នេះ CASA ពុំបានធ្វើសកម្មភាពជូនព្រឹទ្ធាចារ្យខ្មែរ ឱ្យបានដុំកំភួនទេ ដោយសារក្រុមប្រឹក្សាភិបាល បានទាមទារការត្រួតពិនិត្យការគ្រប់គ្រងសហគមហើយ និយាយថា " នាយកប្រតិបត្តិមិនព្រមផ្តល់ឯកសារឱ្យទេ រីឯនាយកប្រតិបត្តិ បានប្រកែកថា ឱ្យឯកសារអស់ហើយ បែរជាថាមិនបានទទួល " ។ ទំនាស់នេះ បណ្តាលឱ្យមានការប្រជុំពុំចេះចប់របស់ក្រុមប្រឹក្សាភិបាល ដឹកនាំដោយលោក សូរិន ជូ ជាប្រធាន រហូតដល់មានការបោះឆ្នោតយ៉ាងប្រញាប់ប្រញាល់មួយ របស់មនុស្សចាស់ប្រមាណ ៥០នាក់ ក្នុងទីស្នាក់ការសមាគម លើក លោក ម៉ៅ ម៉ន ជាប្រធានក្រុមប្រឹក្សាភិបាលថ្មី នាចុងខែឧសភា ឆ្នាំ ២០០៩ ដោយលោក សូរិន ជូ ពុំបានទទួលដំណឹងជាមុន ។ មកទល់ពេល ចេញផ្សាយអត្ថបទនេះ ភាគីម្ខាង បានចោទភាគី ម្ខាងទៀតថា បានប្រព្រឹត្តខុសពីលក្ខន្តិកៈសហគមព្រឹទ្ធាចារ្យខ្មែរ ខាងលោក សូរិន ជូ ថាស្របច្បាប់ ហើយមានឥទ្ធិពលលើលុយកាក់ដាក់នៅធានាគាររបស់សមាគម រីឯលោក ម៉ៅ ម៉ន ថាស្របច្បាប់ ហើយកាន់កាប់បរិវេណទីស្នាក់ការសមាគម ។ អ្នកទាំងពីបានបង្ហាញឥរិយាបទថ្មី ហើយសំខាន់មួយ នាឱកាសមុនបុណ្យជាតិ " យូឡាយហ្វ័ក " នេះថា " ត្រូវតែរកមធ្យោបាយសម្រុះសម្រួលគ្នាឱ្យអាចបំរើព្រឹទ្ធាចារ្យខ្មែរវិញឱ្យទាល់តែបាន ដោយមិនឱ្យនរណាបាក់មុខមាត់ " ។

យើងនឹងបន្តផ្តល់ព័ត៌មាននៅពេលមានការវិវត្តន៍អ្វីថ្មីទៀត ។

វិបត្តិដែលបណ្តាលឱ្យសហគមព្រឹទ្ធាចារ្យ មានក្បាលដល់ទៅពីរ គឺសំដៅទៅលើការគ្រប់គ្រងរបស់នាយកប្រតិបត្តិឈ្មោះ ងួន វណ្ណា ដែលទទួលបានការចោត់ប្រកាន់ថា គ្រប់គ្រងគ្មានប្រក្រតី ។ នៅពេលនេះ គ្មានបុគ្គលិកណាម្នាក់ បានទទួលប្រាក់បៀវវត្សពីសមាគមព្រឹទ្ធាចារ្យនោះទេ ។

### ៣. សភានិស្សិតខ្មែរ

សភានិស្សិតខ្មែរ បង្កើតឡើង និងដឹកនាំដោយនិស្សិតខ្មែរ មកពីសមាគមនៅនិស្សិតខ្មែរ ប្រចាំសកលវិទ្យាល័យ Penn state និស្សិតមកពី UPenn និងមកពីមហាវិទ្យាល័យ CCP ក្នុងបំណងជួយជម្រុញ និងលើកកំពស់ដល់ការសិក្សា ជួយឧបត្ថម្ភគាំទ្រទៅតាមលទ្ធភាពទាំងសម្ភារៈ និងមធ្យោបាយដល់សិស្សានុសិស្ស ដើម្បីឈានទៅរកការអប់រំខ្ពស់ ។

**បំណងរបស់សភានិស្សិតខ្មែរ :**

-សហការណ៍រក្សាមិត្តភាពល្អរវាងនិស្សិត សមាគម និស្សិត និងសហគមន៍នានាដើម្បី :




ពង្រឹងការសិក្សា

.ចូលរួមអភិវឌ្ឍន៍សង្គម

. រក្សាវប្បធម៌ និងប្រពៃណីជាតិ ការឱ្យយោបល់ជួយណែនាំ និងចូលរួមវិភាគទានតាមសទ្ធា នាំឱ្យកូនខ្មែរមានអនាគតល្អ !

សូមទំនាក់ទំនង ដើម្បីជួយតាមលទ្ធភាពមក :

**សភានិស្សិតខ្មែរ :**

**CAMBODIAN STUDEBRS COUNCIL : 2353 South Marshall Street, Philadelphia, PA.19148.**

**Phone : (215) 336-9545**

**Fax : (215) 336-4546**

**Email: cambodianstudentscouncil@gmail. com**

## ទំព័រ Classify

**អង្គការជាននរណា ?**

ជាសៀវភៅកំណត់ត្រានូវរឿងពិត ដែលបានកើតឡើងនៅក្នុងប្រទេសកម្ពុជា ជំនាន់ខ្មែរក្រហមកាន់អំណាច ហើយអ្នកនិពន្ធរើកមុខអ្នកណាដែលជាឃាតករ ដែលគេឱ្យឈ្មោះថាអង្គការនោះ ។ សៀវភៅរួមមាន ៣ក្បាល :

**ភ្នំពេញមុនឆ្នាំ ១៩៥៥**

អ្នកនិពន្ធ កែវ ប៊ុនធឿន បានកត់ត្រាការផ្លាស់ប្តូរមុខមាត់ទីក្រុងភ្នំពេញ ពីជំនាន់មួយទៅជំនាន់មួយ និងហេតុការណ៍ដែលបានកើតឡើងក្នុងជំនាន់នោះ ។

**ទស្សនាវដ្តីខេមរៈបុត្រ :**

លោក បណ្ឌិត ឌុក រ៉ាស៊ី ធ្វើអត្ថាធិប្បាយពីសិទ្ធិមនុស្ស ប្រវត្តិនៃសិទ្ធិមនុស្ស រហូតដល់យកសិទ្ធិមនុស្សធ្វើជាមូលដ្ឋាន ដើម្បីរៀបចំសង្គម រៀបចំច្បាប់រដ្ឋ ធ្វើឱ្យប្រទេសជាតិ មានភាពសុខដុមរម្មនា ។ សូមទំនាក់ទំនងមកលោក **គីម ភឿន** តាមលេខ : **215-680-2059.**

## តមកទំព័រទី ០៣ តើកម្លាំងសម្ព័ន្ធភាព...

ទៅផ្ទាក់ខ្លួនក្រដោយសារផ្ញើរលុយទៅជួយគេឯងច្រើនពេក តើស្ថានភាពនេះ លោកយល់យ៉ាងណាដែរ ?

**ប៉ុណ្ណា អ៊ុន :** យើងត្រូវចែកឱ្យបានច្បាស់លាស់ពីថវិកាណាដែលអាចចាយបានថវិកាណាទៀតដែលចាយមិនបាន គឺត្រូវចែកថវិកាចំណាយរបស់គ្រួសារ និងលុយទៅជួយគេបាន ។ យើងនៅមានវិធីផ្សេងៗសំរាប់រកលុយ ដូចជាធ្វើបុណ្យរៃអង្គាសបានលុយមកយើងបញ្ជូនទៅគណបក្សខ្លះ ហើយខ្លះទៀតយើងទុកចាយវាយក្នុងតំបន់ ។

**សុបិន :** តើអង្គាសលុយ ដើម្បីភាពគ្រប់គ្រាន់របៀបណា ?

**ប៉ុណ្ណា អ៊ុន :** សមាជិកគេបងវិភាគទានប្រចាំឆ្នាំហ្នឹងជាទី១ ថវិកាមួយផ្នែកទៀត គឺយើងធ្វើពិធីបុណ្យផ្សេងៗអង្គាសថវិកា ឬមួយយើងធ្វើជំនួញផ្សេងៗយកលុយមកឧបត្ថម្ភសកម្មភាពនយោបាយរបស់យើង ។

**សុបិន :** ឃើញអ្នកចូលមកជួយនយោបាយច្រើនតែលិច តើគណបក្សសិទ្ធមនុស្សធ្វើម៉េច កុំឱ្យគេលិចបាន?

**ប៉ុណ្ណា អ៊ុន :** អ្នកដែលចូលមកយើង គឺយើងមិនប្រាថ្នាតែយកលុយពីគេទេ គឺយើងបង្កើតទំនាក់ទំនងដើម្បីជួយគ្នា ដូចជាសមាជិកណា គ្មានការងារធ្វើ រីឯសមាជិកផ្សេងមានការងារធ្វើយើងប្រាប់គ្នាឱ្យទៅសុំ ។

**សុបិន :** តើបានន័យថា គណបក្សសិទ្ធមនុស្សមិនតែធ្វើការជួយស្រុកខ្មែរទេ តែជួយពលរដ្ឋនៅ ស.រ.អា នេះដែរ តើត្រូវទេ ?

**ប៉ុណ្ណា អ៊ុន :** យើងយល់ថា ពលរដ្ឋត្រូវមានតុល្យ-ភាពក្នុងគ្រួសារ ទើបអាចជួយគណបក្សបានប្រសើរ គឺបណ្តាញទំនាក់ទំនងនេះហើយ ដែលជួយពលរដ្ឋទាំងនេះឯង ។

សុបិន : សូមអរគុណ ។

**លោក យង់ សុខខន : ចៅកែភោជនីយដ្ឋាន " ឡឺប៉ុទីកាហ្វេ" នៅឡូវែល** ( LE PETIT CAFE) និយាយថា " សម្លឹងមើលកម្ពុជាឃើញក្រុមហ៊ុនជាច្រើននៅលើទឹកដីខ្មែរសម្បូរទៅដោយបរទេស និងយួនជាម្ចាស់ គ្មានខ្មែរទេ ជាការគួរឱ្យបារម្ភពេកណាស់ ដូចនេះ សម្ព័ន្ធភាព



គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្សមានប្រយោជន៍ខ្លាំងណាស់សម្រាប់ឱ្យធ្វើឱ្យខ្មែរ ទៅជាម្ចាស់នៃសម្បត្តិខ្លួន តែពេលនេះខ្ញុំសង្ឃឹមតែ ៤០% តែប៉ុណ្ណោះ ។ បើសម្ព័ន្ធភាពកើតឡើងមែននោះប្រហែលជាយើង ិនអាចឈ្នះ១០០%នោះទេ ក៏ប៉ុន្តែសម្លេងមុខតែនឹងកើន តើបើមិនចូលគ្នានោះទេ ជាការគ្រោះថ្នាក់ណាស់ ។

មើលទៅបើ ហ៊ុន សែន ឥតធ្វើអ្វីសោះ ក៏បាន ៤៥%នៃសម្លេងដែរ ហើយចុងក្រោយនេះ បាន៩០ អាសនៈ អំណាចគេចូលភូមិ-ឃុំ បានដោយប្រើលុយទិញទឹកចិត្តរាស្ត្រ ឬគម្រាមកំហែងឱ្យទាល់តែបានសម្លេងឆ្នោត ។ ដូច្នេះមានតែសម្ព័ន្ធភាពទេ ដែលអាចឆ្លើយតបសេចក្តីត្រូវការរបស់ប្រទេសជាតិបាន ៕

(តមកពីទំព័រទី ១០) **បក្សប្រឆាំងខ្មែរបង្ហាញពីយុទ្ធសាស្ត្រ..**

ឱ្យបានលឿន គឺរួបរួមគ្នាឱ្យបាន ដើម្បីសេចក្តីសង្ឃឹមនោះកើនឡើងច្រើន បើយើងរួបរួមគ្នាទាំងពីរនេះបានហើយ យើងក៏អាចបង្រួបបង្រួមគណបក្សផ្សេងទៀតបានដែរ កម្លាំងរួបរួមនេះធ្វើឱ្យពលរដ្ឋខ្មែរ ទៅបោះឆ្នោតបានច្រើន " ។

នៅលើសំណើរ និងការឱ្យយោបល់ទាំងពីរនេះ លោក សម រង្ស៊ី និង លោក កឹម សុខា យល់ស្របទាំងស្រុង ហើយបន្ថែមថា " សម រង្ស៊ី : យើងកំពុងរួបរួមអ្នកប្រជាធិបតេយ្យ ដើម្បីការឈ្នះឆ្នោតនៅឆ្នាំ ២០១៣ " " សត្រូវយើងចង់ឱ្យយើងបែកបាក់គ្នា ដូច្នេះ យើងត្រូវតែរួបរួមគ្នា យើងកំពុងអនុវត្តន៍ទ្រឹស្តីរួបរួមគ្នានេះហើយ" ។

**លឹម ហាល់វីន** សួរថា " **សំនួរទី១** : ដោយសារតែខ្មែរយើងបែកបាក់ខ្ទេចខ្ទាំច្រើនណាស់ហើយ តើឯកឧត្តមទាំងបីមានវិធីយ៉ាងណា ដើម្បីឱ្យសេចក្តីសង្ឃឹមកើតឡើងវិញ ។ **សំនួរទី២** : ដោយសារមានការឈ្លានពានជាបន្តបន្ទាប់គ្នា ហើយឥឡូវនេះ ថៃបានលើកទ័ពមកឈ្លានពានខ្មែរ តើឯកឧត្តមមានវិធីណា ដើម្បីកុំឱ្យមានការឈ្លានពានបន្តទៅទៀត ?



**សម រង្ស៊ី** : ខ្ញុំមិន ត្រឹមតែមានសេចក្តីសង្ឃឹមនោះទេ តែមានជំនឿថែមទៀត ដែលឈរលើមូលដ្ឋានច្បាស់លាស់ : **ទី១**. កត្តាប្រជាសាស្ត្រ ( DEMOGRAPHIC) គឺយុទ្ធជនដែលអាយុតិចជាង ២០ឆ្នាំ មាន៥០% ហើយមានអាយុតិចជាង ៣០ឆ្នាំវិញ គឺចំនួនដល់ ទៅ២/៣ នៃអ្នកបោះឆ្នោតបានចំនួន ៨លាននាក់ អ្នក ២/៣ នោះ ក្រោយជំនាន់ខ្មែរក្រហម ពួកគេមិនជឿ ហ៊ុន សែន នៅលើការឃោសនាថាគ្រាន់ បើជាងខ្មែរក្រហមនោះទេ តែគេមើលឃើញទៅលើការរីកចំរើននៃប្រទេសជិតខាងទៅវិញ ហើយគេយល់ថាប្រទេសត្រូវតែមានការផ្លាស់ប្តូរអ្នកដឹកនាំ ហើយម្យ៉ាងទៀត នៅក្នុងការស្រាវជ្រាវវិទ្យាសាស្ត្រថ្មីៗ គេបានរកឃើញថា : ក្នុងផ្ទះខ្មែរនីមួយៗមានបីជំនាន់ គឺជំនាន់ជីតា ច្រើនបោះឆ្នោតឱ្យហ៊្វុនស៊ិនប៉ិច ដោយសារស្គាល់ ស្តេចស្រឡាញ់ស្តេច - ជំនាន់ឪពុកម្តាយ គឺស្គាល់ខ្មែរក្រហមស្គាល់ CPP បោះឆ្នោតឱ្យគណបក្សប្រជាជន - ជំនាន់កូន គឺផ្ទះនីមួយៗ មានកូនច្រើន គេបោះឆ្នោតឱ្យអ្នកប្រជាធិបតេយ្យ នេះជាសេចក្តីសង្ឃឹមទី១. **ទីពីរ.** គឺការអប់រំ : អ្នកទទួលចំណេះវិជ្ជា ទោះតិចតួច បានក្លាយជាអ្នកចេះគិត ហើយស្រឡាញ់យុត្តិធម៌ ហើយការស្ទង់មតិរបស់ IRI បាននិយាយថា កន្លែងណាដែលសម្បូរអ្នកចេះ ដូចជាទីក្រុងភ្នំពេញ គេបោះឆ្នោតឱ្យអ្នកប្រជាធិបតេយ្យ ឆ្នាំ ២០០៣ ហ៊្វុនស៊ិនប៉ិច បូកនឹងស៊ីភីភី នៅក្រោម សម រង្ស៊ី ឆ្នាំ ២០០៨ នេះ បើកុំតែមានល្បិចលុបឈ្មោះអ្នកបោះឆ្នោត ២ សែននាក់ គឺមិនអាចឈ្នះកម្លាំងអ្នកប្រជាធិ-បតេយ្យទេ នេះគឺចរន្តឈ្នះទីពីរ ពីព្រោះមនុស្សកាន់តែចាស់ កាន់តែចេះច្រើន ។ កត្តាទីបី : គឺមនុស្សដែលចូលមករស់នៅទីក្រុង គឺមកពីជនបទខ្វះលុយ ខ្វះដី អត់បាយ ឥតការងារធ្វើ ដែលតាមខ្ញុំឃើញមិនតិចជាងបីលាននាក់ទេ អ្នកទាំងនោះបានបោះឆ្នោតឱ្យ សម រង្ស៊ី ទេ អ្នកក្រីក្របោះឆ្នោតឱ្យអ្នកប្រជាធិបតេយ្យ - **កត្តាទីបួន** : គឺកត្តាសេដ្ឋកិច្ច គឺនៅកន្លែងណាដែលសេដ្ឋកិច្ចកើនទីនោះអ្នកប្រជាធិបតេយ្យកើន ពុំមែនមានន័យថា ហ៊ុន សែន ជាអ្នកមានស្នាដៃនោះទេ តែជាស្នាដៃ ចរន្តសេដ្ឋកិច្ចប្រទេសជិតខាង ដែលគេរីកចំរើន គឺយើងក៏ទទួលចំហាយពីគេដែរ- ស្នាដៃជំនួយអន្តរជាតិ - ជំនួយពីបងប្អូនផ្ញើលុយពីស្រុកក្រៅ អ្នកទាំងនោះនឹងបោះឆ្នោតដោយគ្មានកង្វល់ តែអ្នកក្រដែល ហ៊ុន សែន ឱ្យអង្ករ ២គីឡូ គឺ គេបោះឆ្នោតក្រពះ ដែលធ្វើឱ្យគេរស់ទី១ថ្ងៃទៅ ១ថ្ងៃ ផ្ទុយគ្នានឹងអ្នកមធ្យម ដែលបោះឆ្នោតដោយវិញ្ញាណ ដោយព្រលឹង គេមិនបោះឆ្នោតឱ្យ ហ៊ុន សែន ទេ ។ **កត្តាទី៥ :** គឺគមនាគមន៍ និងទូរគមនាគមន៍ : គេសង្កាត់ឃើញថា ទីណាដែលដាច់ស្រយាល គ្មានទំនាក់ទំនង នៅទីនោះគណបក្សប្រជាជនឈ្នះ តែកាលណាមានផ្លូវចូលទៅដល់ មានមនុស្ស និងទំនិញចេញចូលទីនោះកម្លាំងប្រជាធិបតេយ្យនឹងកើននៅទីនោះ កម្លាំងគំនិត កម្លាំងព័ត៌មាន នឹងបំបែកកម្លាំងផ្តាច់ការគណបក្សប្រជាជននៅទីនោះបាន - ម្យ៉ាងទៀតខាងទូរគមនាគមន៍ មានទូរស័ព្ទ មានមធ្យោបាយទាក់ទងទំនើប មានវិទ្យុ ទូរទស្សន៍ កាលពីបោះឆ្នោតឆ្នាំ១៩៩៣ បើកុំតែបាន វីអូអេ និងវិទ្យុអ៊ិនតាក់ ហើយទូរលេខថ្មីបំផុតនេះ គឺមានទូរស័ព្ទដៃ ៤លានគ្រឿង ប្រើនៅកម្ពុជា គឺទូរស័ព្ទនេះហើយ ដែលយើងអាចរៀបចំបណ្តាញបញ្ជូនព័ត៌មានជូនពលរដ្ឋបាន មានបញ្ជូនវីដេអូឱ្យបានមើលទូរទស្សន៍បាន មិនចាំបាច់ទូរទស្សន៍គណបក្សប្រជាជននោះទេ គឺយើងរៀបចំបណ្តាញព័ត៌មានឱ្យខ្លាំងទៅយើងឈ្នះហើយ ។

**លោក កឹម សុខា** : បានមានប្រសាន៍បន្ថែមថា រូបមន្តដែលថា ធ្វើឱ្យឈ្នះលើរូបមន្ត លោក សម រង្ស៊ី ថា " កត្តាបត្យានុម័ត្រ គឺកត្តាដែលទាក់ទងនឹងសេដ្ឋកិច្ច និងសង្គម ។ល។ គឺកត្តាដែលទាក់ទងនឹងអ្វីៗដែលក្រៅពីខ្លួនយើង គឺខ្ញុំសូមបន្ថែមថា គឺត្រូវមានកត្តាឈ្នះលើខ្លួនយើងផងនោះ ទើបគ្រប់គ្រាន់ ព្រះពុទ្ធឱវាទនិយាយថា បើចង់កែ គេត្រូវកែខ្លួនឯងជាមុនសិន ដូច្នេះនៅអាណត្តិក្រោយនេះ សុំឱ្យផ្គុំគ្នាសិនមក រឿងរវើរវាយឯទៀតៗ សុំកុំអាលគិត នេះសំនួរទី១ - ឯសំនួរទីពីរ. ស្តីពីបញ្ហាប្រទេសឈ្លានពាន គឺយើងពុំអាចធ្វើអ្វីបានទេ មុនពេលយើងឈ្នះឆ្នោត ទាល់តែយើងឈ្នះឆ្នោត យើងឥតជំពាក់គុណនរណា គឺយើងអាចដោះស្រាយបញ្ហាបូរណភាពជាតិយើងបាន ។

**ញ៉ូយ ចំរើន** : បងប្អូនខ្មែរយើងចង់ដឹងថាតើវិធីដែលនឹងត្រូវរួបរួមជាសម្ព័ន្ធមួយនោះ នឹងត្រូវធ្វើរបៀបណា ?



**កឹម សុខា** : យើងមានចុះហត្ថលេខាលើសេចក្តីថ្លែងការណ៍រវាងគណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស កាលពីថ្ងៃទី ១៥ មករា ឆ្នាំ ២០០៩ នេះ ថាយើងរួបរួមដើម្បីបង្កើតចលនានយោបាយមួយដើម្បីផ្លាស់ប្តូរ គឺនៅពេលបោះឆ្នោតខាងមុន យើងនឹងដាក់បេក្ខជនយើងទាំងពីរគណបក្ស នៅលើបញ្ជាឈ្មោះតែមួយឱ្យពលរដ្ឋបោះឆ្នោត - បញ្ជីរួមនេះ គឺដូចគណ-បក្សតែមួយហើយ គ្មានគណបក្ស សម រង្ស៊ី ផ្សេងពីគណបក្សសិទ្ធិមនុស្សទៀតទេ នេះធ្វើកុំឱ្យវាបែកសន្លឹកឆ្នោត - ហើយយើងបានបង្កើតក្រុមការងាររួមមួយ ហើយដើម្បីជំដែកគ្នា ។

**សម រង្ស៊ី:** ខ្ញុំចង់និយាយពីយុទ្ធសាស្ត្រយើងដើម្បីឈ្នះ គឺការពង្រឹងខ្លួនយើងដើម្បីឈ្នះ ហើយខ្ញុំបានសិក្សាសមរភូមិថា តើចំណុចខ្សោយរបស់យើងនៅកន្លែងណា ដែលត្រូវការកែ រីឯគូបដិបក្ខត្រូវដឹងថា ចំណុចខ្លាំងគេនៅកន្លែងណា ? ហើយចំណុចខ្សោយនៅកន្លែងណា ? រីឯកម្លាំងបរទេសដូចអាមេរិក តើជម្រុញគេយ៉ាងម៉េច ដើម្បីឱ្យគេជួយយើង ? ឬឱ្យគេកាត់ជំនួយគូបដិបក្ខ ? យុទ្ធសាស្ត្រយើងដើម្បីឈ្នះ គឺទី១ ប្រមូលសម្លេង ទីពីរ ការពារសម្លេង ហើយមុននឹងប្រមូល ត្រូវធានាថាខ្មែរ ដែលមានសិទ្ធិបោះឆ្នោត បានទៅបោះឆ្នោត ដូច្នេះ ពុំមែនថ្ងៃបោះឆ្នោតទេ ដែលត្រូវធានា គឺគេត្រូវត្រៀម ៥ឆ្នាំមុន គឺ ១ឆ្នាំម្តងពិនិត្យបញ្ជីឈ្មោះអ្នកបោះឆ្នោតឡើងវិញ ល្បិចគណបក្សប្រជាជនច្រើនណាស់ គឺធ្វើដូចម្តេចឱ្យគ្នាគេទៅចុះឈ្មោះ ហើយគ្នាយើងគ្មានឈ្មោះ គេបំបៅងបញ្ជីដាក់ឃ្មួនបញ្ចូល គេលុប គេលួច គេបន្លំ ... ដូច្នេះ យើងត្រូវដឹងពីយុទ្ធសាស្ត្រគូបដិបក្ខទាំងមុន និងទាំងកំពុងបោះឆ្នោត ដើម្បីការពារ និងប្រមូលគ្នាទៅការពារសន្លឹកឆ្នោត ដើម្បីឱ្យអាចផ្ទុះបញ្ជាំងឆន្ទៈប្រជារាស្ត្រខ្មែរពិតប្រាកដបាន ។ តទៅលេខក្រោយ